ខ្មែរប៉ុស្តិ៍ ស.រ.អា

KhmerPost USA

Printing The Cambodian World News

VOL. 06 ISSUE 90 Sept 10th - 23th, 2011

សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
438 LINDLEY AVE.
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY

មាតិការឿង ទំព័រ



# ឃាតកម្មលើក្មេងពីរនាក់ ដោយម្ដាយបង្កើត

**ដោយ : ពិន សំខុន**

**ហ្វីឡាដែលហ្វៀ :** នៅគេហដ្ឋានផ្លូវលេខ ១៨ ខាងត្បូងហ្វីឡាដែលហ្វៀនាថ្ងៃទី៣១ខែសីហា ឆ្នាំ២០១១វេលាម៉ោង៥រសៀល មានភាពចលាចលមួយបានផ្ទុះឡើងដោយចលនាប៉ូលិស និងក្រុមសង្គ្រោះព្រោងព្រាត ។ ដំណឹងលេចឮឡើងគឺម្ដាយអាយុ២៧ឆ្នាំ សម្លាប់កូនខ្លួនឯងពីររូប ស្រីអាយុ១២ឆ្នាំនិងប្រុសអាយុ៨ឆ្នាំ ដោយចាក់និងកាំបិតច្រើនដងលើដើមទ្រូងកូន រីឯម្ដាយមានដំណឹងថា សាកល្បងចាក់ខ្លួនឯងដោយកាំបិតដែរ តែមិនសម្រេចក៏លេបថ្នាំបំពុលសត្វកណ្ដុរធ្វើឱ្យបាត់ស្មារតីដួលដេកតែក្រោយមកសង្គ្រោះជីវិតបាន ។ សេចក្ដីសន្និដ្ឋានដំបូង គឺស្ត្រីឃាតកលើកូនខ្លួនឯងមានវិបត្តិផ្លូវចិត្ត ហើយទទួលការព្យាបាលដោយអ្នកឯកទេសខាងជម្ងឺផ្លូវចិត្ត ហើយក៏ធ្លាប់មានប្រវត្តិចង់បញ្ចប់ជីវិតខ្លួនឯងរួចម្ដងមកហើយ គឺម្ដងនៅឆ្នាំ២០០៧ និងម្ដងទៀត ២០១០ តែមិនបានសម្រេចទេ។ ដំណឹងនេះគួរឱ្យរន្ធត់


កុមារី សុវណ្ណា និងកុមារា សុវណ្ណ

និងគួរឱ្យសោកស្ដាយរបស់សហគមន៍ខ្មែរនឹងអ្នករស់នៅជិតខាងដែលបានស្គាល់គ្រួសារនោះសុទ្ធតែដឹងថា ជាគ្រួសារដ៏ល្អស្លូតត្រង់ស្គាល់ខុសស្គាល់ត្រូវចេះជួយយកអាសារអ្នកដទៃមិនដែលខាន គឺគ្រួសារលោក ម៉ៅ ម៉ន នឹងអ្នកស្រី ស្រ៊ុន ខេម ដែលជាជីតា ជីដូនរបស់ក្មេងរងគ្រោះឈ្មោះ សុវណ្ណា (ស្រី)និង សុវណ្ណ (ប្រុស)នឹងម្ដាយ ចាន់ធី ។ អ្នកស្រី ខេម នៅពេលបាត់សម្លេងកូនចៅ **តទៅទំព័រទី ១៦**

# អំទូកនៅហ្វីឡាដែលហ្វៀ

ផែនទីបង្ហាញបង្ហាញកន្លែងអុំទូក

**សូមអានទៅទំព័រទី១៩**

ក្រុមអ្នកអុំទូកខ្មែរក្រោមឈ្មោះបានមេដាយមាស នៅ Florida កាលពីខែកក្កដា ឆ្នាំ២០១១

# លោកស្រី យីងឡាក់ នឹងមកបំពេញទស្សនៈកិច្ចផ្លូវការលើកដំបូងនៅកម្ពុជា

## Thai Prime Minister Yingluck to meet Hun Sen

**ដោយ : នៅ វណ្ណារិន**

THE CAMBODIA DAILY



●ក្រុមមន្ត្រីបាននិយាយកាលពីម្សិលមិញថា លោកស្រី យីងឡាក់ ស៊ីណាវ៉ាត្រា នាយករដ្ឋមន្ត្រីថៃនឹងមកបំពេញទស្សនៈកិច្ចផ្លូវការលើកដំបូងរបស់លោកស្រីនៅក្នុងប្រទេសកម្ពុជានៅថ្ងៃព្រហស្បតិ៍សប្ដាហ៍ក្រោយនេះ ដែលពេលនោះលោកស្រីនឹងជួបជាមួយលោកនាយកមន្ត្រី ហ៊ុន សែន។

ទំនាក់ទំនងប្រេះឆាកន្លងមករវាងថៃ និងកម្ពុជាកំពុងត្រូវបានផ្សះផ្សាឡើងវិញ ចាប់តាំងពីមានជ័យជំនះក្នុងការបោះឆ្នោត នាពេលថ្មីៗនេះរបស់លោកស្រី យីង ឡាក់។

ជាប្អូនស្រីរបស់លោក ថាក់ស៊ីន ស៊ីណាវ៉ាត្រា អតីតនាយករដ្ឋមន្ត្រីថៃ ដែលកំពុងរត់គេចខ្លួននោះ លោកស្រី យីងឡាក់ បានដឹកនាំគណបក្សភឿថៃ ដែលមានទំនាក់ទំនងល្អជាមួយកម្ពុជា ដោយទទួលបានជ័យជំនះ ក្នុងការបោះឆ្នោតកាលពីខែកក្កដា។

ចាប់តាំងពីពេលនោះ មកភាពតានតឹងនៅតាមព្រំដែនកម្ពុជា-ថៃ បានធូរស្រាលឡើងវិញ ហើយក្រុមមន្ត្រីនៃប្រទេសទាំងពីរបានលើកសរសើរម្ដងហើយម្ដងទៀត អំពីទំនាក់ទំនងដ៏កក់ក្ដៅនេះ។

លោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេសបានមានប្រសាសន៍ថា "លោកស្រីនឹងមកបំពេញទស្សនៈកិច្ចជាផ្លូវការនៅថ្ងៃទី១៥ ខែកញ្ញានេះ ។ វាជាដំណើរទស្សនៈកិច្ចតែមួយថ្ងៃប៉ុណ្ណោះ" ។

លោក កុយ គួង បានបញ្ជាក់ថា លោកស្រី យីងឡាក់ នឹងជួបជាមួយលោកនាយករដ្ឋមន្ត្រីមែន ប៉ុន្តែលោកបានមានប្រសាសន៍ថា លោកមិនទាន់ដឹងថា នាយករដ្ឋមន្ត្រីទាំងពីរគ្រោងនឹងពិភាក្សាគ្នាអំពីអ្វីខ្លះនោះទេ។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្ដីការគណៈរដ្ឋមន្ត្រីបានមានប្រសាសន៍ថា ដំណើរទស្សនៈកិច្ចរបស់លោកស្រី យីងឡាក់ គឺជាសញ្ញានៃទំនាក់ទំនងប្រសើរឡើងវិញ រវាងប្រទេសទាំងពីរ។

លោក ផៃ ស៊ីផាន បានមានប្រសាសន៍ថា "នេះគឺជាសញ្ញាវិជ្ជមានមួយនៃការចាប់ផ្ដើមសករាជថ្មីនៃសហប្រតិបត្តិការ ។ **តទៅទំព័រទី ២២**

# អ្នកអានឆ្លើយតបលិខិត លឹម គិមយ៉ា (លេខ៨៨)

***សូមលោកប្រធានខ្មែរប៉ុស្តិ៍មេត្តាចុះផ្សាយ សេចក្តីឆ្លើយតបរបស់នាងខ្ញុំ សូមអរគុណទុកជាមុន***

**សូមជំរាបសួរលោក លិម គិមយ៉ា**

**ខ្ញុំបានអានអត្ថបទមួយរបស់លោកដែលចុះផ្សាយនៅក្នុងសារព័ត៌មានខ្មែរប៉ុស្តិ៍ ស.រ.អា នាខែសីហា ថ្ងៃទី ១៥ ដល់ថ្ងៃទី ២៥ ទំព័រទី ៥ ដែលមានចំណងជើងថា** ***ទស្សនៈអ្នកឯករាជ្យគួរឱ្យខ្លាចពី សម រង្ស៊ី*** **។ អត្ថន័យនៅក្នុងអត្ថបទនេះ គឺផ្ទុយពីអត្ថន័យរបស់ចំណងជើង ។ សូមលោកអានវាម្តងទៀតដើម្បីឱ្យយល់ថា តើខ្ញុំចង់ពោលអំពីអ្វី** "***ទស្សនៈអ្នកឯករាជ្យ គួរឱ្យខ្លាចពី សម រង្ស៊ី***" ។ បើសិនជាលោកនៅតែមិនទាន់ជ្រាបច្បាស់នោះ នាងខ្ញុំសូមជំរាបបន្ថិចទៀតទៅចុះ ។ នៅវគ្គទី១ ឬ វគ្គដើមរបស់ចំណងជើង គឺលោកសរសេរថា ***ទស្សនៈអ្នកឯករាជ្យ*** ហើយវគ្គទីពីរ ឬវគ្គចុងរបស់ ចំណងជើង គឺលោកសរសេរថា "***គួរឱ្យខ្លាចពី សម រង្ស៊ី*** ។ ទាំងវគ្គដើម និងវគ្គចុងរបស់ចំណងជើង គឺផ្ទុយពីទស្សនៈផ្ទាល់ដែលលោកមាន ត្បិតថា បើយោងតាមចំណងជើង គឺលោកតាំងខ្លួនជាអាជ្ញាកណ្តាល (តាមពិតទៅឯករាជក្យ គឺមានន័យថា មិនពឹងផ្អែកលើគេមិនមែនមានន័យថា អ្នកនៅកណ្តាលទេ ) តែបើតាមអត្ថន័យរបស់អត្ថបទ គឺលោកសរសេរបង្ហាញឱ្យគេយល់ថា លោកគឺមិនមែនជាអាជ្ញាកណ្តាល (ឬជាអ្នកឯករាជ្យដែលលោកយកមកប្រើនោះឡើយ) ។ អ្នកអាជ្ញាកណ្តាល គឺមិនពោលសរសើរមួយ ហើយបង្អាប់មួយនោះទេ ។ ទោះបីលោកជាសមាជិករបស់បក្សសិទ្ធិមនុស្ស ឬមិនមែននោះ គឺមិនសំខាន់ឡើយ (ហើយខ្ញុំក៏មិនមែនជាសមាជិកបក្ស សម រង្ស៊ី ឬក៏ជាសមាជិកបក្សនយោបាយណាមួយដែរ គឺគ្រាន់តែជាកូនខ្មែរម្នាក់ប៉ុណ្ណោះ) តែដែលគួរឱ្យអ្នកអានចាប់អារម្មណ៍នោះ គឺត្រង់ន័យថា របស់អត្ថន័យនេះ គឺសរសើរបក្សសិទ្ធិមនុស្សតែបង្អាប់បក្ស សម រង្ស៊ី ។ វគ្គជាច្រើននៅក្នុងអត្ថបទនេះ គឺពោលតែអំពីទង្វើដែលលោកយល់ថា សម រង្ស៊ី មិនគួរនឹងធ្វើ ប៉ុន្តែសូមលោកដឹងថា ចំពោះលោក សម រង្ស៊ី គឺគាត់យល់ថា អំពើអស់ទាំងនោះ គឺជាការល្អហើយ ទើបលោក រង្ស៊ី ខំធ្វើ (សូមកុំភ្លេចថា អ្វីដែលយើងយល់ថា អាក្រក់ គឺមានអ្នកផ្សេងយល់ថា ល្អ) ហើយបើការយល់ឃើញរបស់លោក រង្ស៊ី នោះ ជាការខុសនោះតាមកម្មរបស់លោកទៅចុះ តែចំពោះលោក គិមយ៉ា ផ្ទាល់ គឺកុំពោលបង្អាប់លោក រង្ស៊ី ធ្វើអ្វី ព្រោះគាត់ក៏ជាខ្មែរដូចជាលោកដែរ... បើថា គ្រាន់បើណាស់ចង់បង្អាប់នោះ គួរបង្អាប់ ចិន យួន សៀម បារាំង អាគាំង ស្អីៗទៅ ។ វគ្គដែលសរឱ្យរឹតតែឃើញច្បាស់ថា លោកដើរជាន់កែងខ្លួននោះ (ផ្ទុយនឹង***ទស្សនៈឯករាជ្យ*** នៅក្នុងចំណងជើង) គឺវគ្គចុងក្រោយបង្អស់របស់អត្ថបទលោកដែលសរសេរថា "***គណបក្ស សម រង្ស៊ី រស់សព្វថ្ងៃដោយសារតែសល់ឈ្មោះ និងឥទ្ធិពលកាលពីលោកធ្វើរដ្ឋមន្ត្រី ក៏ប៉ុន្តែឥឡូវនេះ សមាជិកសកម្ម និងប្រជាពលរដ្ឋខ្លះលែងទុកចិត្ត ហើយលោកប្រធានចោលស្រុកទៅទៀត ឃើញថា គណបក្សនេះនឹងរស់នៅមិនយូរទេ.... បើលោកនៅតែចចេសមិនព្រមរួបរួមលោកនឹងនៅសល់តែបាតដៃទទេ***" ។

អៃយ៉ូយ! ពាក្យទាំងអស់នេះ គួរឱ្យឈឺចាប់ណាស់ ! បើខ្ញុំជាលោក សម រង្ស៊ី វិញ ខ្ញុំនឹងអត់បាយឱ្យស្លាប់ទៅឆីតែគុយទាវបានហើយ ។ លោក គិមយ៉ា ហេតុអ្វីបានលោកចូលចិត្តប្រើតែពាក្យអសុរសទ្រគោះបោះបោកដាក់បងប្អូនបង្កើតរបស់លោកយ៉ាងនេះ ? បើលោកមិនចូលចិត្តនឹងទង្វើនយោបាយ ឬចរិតផ្ទាល់របស់លោក សម រង្ស៊ី (ដែលលោក គិមយ៉ា ខំលើកយកវាមកបកអាក្រាតនៅតាមទំព័រសារ-ព័ត៌មានខ្មែរប៉ុស្តិ៍ ស.រ.អា នេះ) យ៉ាងណាក៏ដោយចុះ ក៏លោកគួរគិតថា គាត់ក៏ជាខ្មែរ ហើយលោកក៏ជាខ្មែរ ដែលសុទ្ធតែនាំគ្នារត់ចោលស្រុកដូចជាខ្ញុំ និងខ្មែររាប់សែននាក់នោះដែរទេតើ ! ម្យ៉ាងទៀត វគ្គទីពីរនៅក្នុងចំណងជើងដែលសរសេរថា ***គួរឱ្យខ្លាចពី សម រង្ស៊ី*** នោះគឺមិនមានចំណុចណាឱ្យប្រាកដថា លោកផ្តល់នូវការសន្និដ្ឋានខ្លះៗផង ដើម្បីសន្មត់ឱ្យមានជាចម្លើយទៅវិញ គឺដូចជានៅពាក់កណ្តាលវគ្គទី១៣ (មិននឹងដល់វគ្គចុងក្រោយបង្អស់) នោះលោកសរសេរថា "*បើសិនជាយើងក្រឡេកមើលទៅចរិតលោក សម រង្ស៊ី ប្រហែលជាយើងអាចរកចំលើយនេះឃើញ... លោកមិនព្រម ពីព្រោះខ្លាចអ្នកដទៃចេញមុខចេញមាត់ជាង*" ។

ដូច្នេះ បើតាមយោបល់របស់ខ្ញុំ គឺលោក គិមយ៉ា គួរប្តូរចំណងជើងអត្ថបទរបស់លោកដែលសរសេរថា "***ទស្សនៈអ្នកឯករាជ្យ គួរឱ្យខ្លាច ពី សម រង្ស៊ី***" នោះមកជា "***ទស្សអ្នកលេងរែក ឬទស្សនៈអ្នកលេងអុកញ គួរឱ្យខ្លាចពីខ្មែររត់ចោលស្រុក***" ទៅវិញចុះ ។ ហេតុអ្វី? ទី១ តាមមើលទំនង គឺលោកមិនទាន់ចេះលេងល្បែងរែកនៅឡើយទេ ពោលគឺថា បើចង់រែកកូនឈើរបស់ដៃគូរ គឺយើងត្រូវប្រើល្បិចយ៉ាងណាឱ្យបានចូលទៅនៅប្រឡោះកណ្តាលកូនរែកពីរសិន គឺបានន័យថា បើលោក គិមយ៉ា ចង់តាំងខ្លួនជាអ្នកកណ្តាល (***ឬពាក្យថា អ្នកឯករាជ្យ*** ដែលលោកប្រើនៅក្នុងការសរសេរអត្ថបទនេះ ) នោះលោកត្រូវនិយាយសរសើរទាំងពីរបង្អាប់ទាំងពីរ គឺត្រូវចេះលៃទម្ងន់ឱ្យស្មើគ្នាឱ្យនៅជាអ្នកកណ្តាល ដោយមិនកាន់ជើងម្ខាងណាឡើយ ។ តែមើលទៅលោកដូចជាចេះលេងអុកជាងលេងរែក ព្រោះដូចជាចូលចិត្តរុញគេឱ្យដួលអុកគួថណាស់ (ព្រោះឃើញលោកចេះអុកឱ្យលោក សម រង្ស៊ី គួរសមដែរ) ឯចំពោះចម្លើយទី២ ថាហេតុអ្វីបានជា លោក គិមយ៉ា គួរប្តូរចំណងជើងអត្ថបទរបស់លោក **តទៅទំព័រទី១៧**

# កិច្ចសម្ភាសន៍រវាងខ្មែរប៉ុស្តិ៍ជាមួយព្រះគ្រូចៅអធិការនៃវត្តដ៏រីកចំរើនមួយនៅហ្វីឡាដែលហ្វៀ


ព្រះគ្រូ រ័ត្ន មុនី

**ដោយ : អ៊ុំមលឿម**

ដូចការសន្យាកាលពីលេខមុន "ខ្មែរប៉ុស្តិ៍" ត្រូវបានអនុញ្ញាតជាពិសេស ដើម្បីធ្វើកិច្ចសម្ភាសន៍ជាមួយព្រះគ្រូចៅអធិការវត្ត "ព្រះពុទ្ធរង្សី" ព្រះនាម រ័ត្ន មុនី វិរិយបណ្ឌិតោ ទាក់ទងទៅនឹងការវិវឌ្ឍន៏រីកចំរើន យ៉ាងឆាប់រហ័សរបស់វត្តខ្មែរក្នុងសហគមន៍ហ្វីឡាដែលហ្វៀមួយនេះ ។ ដូច្នេះ សូមសណ្តាប់ជាមួយ នឹងកិច្ចសម្ភាសន៍ដែលមានខ្លឹមសារទាំងស្រុងដូចតទៅ :

**អ៊ុំមលឿម :** ជាបឋមខ្ញុំកូណា សូមថ្វាយបង្គំ ខ្ញុំកូណាសូមទូលសួរថា តើរហូតមកដល់ឥឡូវនេះ វត្ត "ព្រះពុទ្ធរង្សី" ចាប់បដិសន្ធិបានប៉ុន្មានឆ្នាំហើយ! មានការផ្លាស់ប្តូរទីតាំងប៉ុន្មានកន្លែងហើយ?

**ព្រះគ្រូរ័ត្នមុនី :** ពរសូមអរគុណ "ខ្មែរប៉ុស្តិ៍" ដែលបានចូលរួមផ្សព្វផ្សាយដល់សហគមន៍ខ្មែរទាំងមូល ។ វត្ត "ព្រះពុទ្ធរង្សី" ត្រូវបានកសាងឡើងក្នុងរវាងខែពីរ ឬខែបីក្នុងឆ្នាំ២០០៣ រហូតមកដល់ឥឡូវនេះវត្ត "ព្រះពុទ្ធរង្សី" បាន៨ឆ្នាំជាងហើយពរ ។ ក្នុងការកសាងវត្ត "ព្រះពុទ្ធរង្សី" ដំបូងឡើយ គឺបានទិញយកផ្ទះមួយខ្នងដែលមានពីជាន់ ជាន់ខាងក្រោមមាន២បន្ទប់ ដោយថ្មែជាន់ខាងក្រោមហ្នឹង ឱ្យក្លាយទៅជាកន្លែងសម្រាប់ធ្វើបុណ្យមួយហើយ មួយបន្ទប់ទៀតជាចង្ក្រានបាយហើយ មានភាពចង្អៀត តូចណាស់ ។ ជាន់ទី៣ មានបីបន្ទប់ និងបន្ទប់ទឹកមួយ ។ ព្រះសង្ឃដែលចូលរួមកសាងដំបូងបង្អស់ គឺមានខ្ញុំព្រះករុណាអាត្មាភាពផ្ទាល់ នឹងព្រះតេជគុណប្រធានក្រុមប្រឹក្សាភិបាល គឺព្រះតេជគុណ ស៊ីវត្ថា ដែលជាអ្នកសហការណ៍គ្នាក្នុងការកសាង ។ ហើយរហូតមកដល់ឥឡូវនេះ គឺយើងបានរើពីផ្លូវលេខ៥មកនៅទីតាំងថ្មីគឺផ្លូវលេខ៦ កាច់ជ្រុង Ritner នេះជាកន្លែងចុងក្រោយរបស់យើង ។



**អ៊ុំមលឿម :** ក្នុងរយៈពេលជាង៨ឆ្នាំហ្នឹង តើខាងគណកម្មការវត្តក៏ដូចជាព្រះសង្ឃគ្រប់អង្គ ដែលគង់នៅក្នុងវត្ត មានការនឿយហត់នឹងខំប្រឹងយ៉ាងណាដែរទាន?

**ព្រះគ្រូរ័ត្នមុនី :** ក្នុងការកសាងនេះ ព្រះសង្ឃហត់នឿយណាស់ គឺហត់នឿយជាងស្រុកខ្មែរ ឬហត់នឿយជាងញាតិញោមធ្វើការរោងចក្រទៀត ការហត់នឿយនេះ ដោយសារព្រះសង្ឃគ្រប់ព្រះអង្គលោកព្យាយាមពរ ។ ពេលព្រឹកក្រោកឡើងថ្វាយបង្គំព្រះនៅម៉ោង៤កន្លះមួយសារ លុះថ្វាយបង្គំព្រះហើយពេលខ្លះលោកសម្រាកមួយភ្លែតទើបលោកធ្វើការ លោកធ្វើការទៅតាមលទ្ធភាពរបស់លោក លុះដល់ពេលឆាន់ទើបលោកសម្រាក លុះឆាន់ហើយ សម្រាកបានកន្លះម៉ោង ឬមួយម៉ោងចំពោះព្រះសង្ឃអង្គណាដែលទំនេរពីម៉ោងសិក្សារបស់លោក គឺជួយធ្វើការរហូតដល់ល្ងាចម៉ោង៦, ៧ក៏មានដែរ ហើយការងារហ្នឹងជាការងារធ្ងន់ៗ ដូចជាផ្នែកខាងសំណង់ ការកសាងចាក់របង ទ្វារនឹងអគារ វត្តទាំងមូល គឺព្រះសង្ឃធ្វើ៧០ភាគរយ ហើយយើងជួលជាងសម្រាប់អ្នកដែលមាន Permit ឬ License ដើម្បីឈរឈ្មោះសម្រាប់កសាង ដើម្បីឱ្យសបតាមច្បាប់ស្រុកនេះពរ ។

**អ៊ុំមលឿម :** តើព្រះសង្ឃគ្រប់អង្គសុទ្ធសឹងជាអ្នកមានជំនាញឯកទេសស្ថាបត្យកម្មសំណង់ ដែរទេ?

**ព្រះគ្រូរ័ត្នមុនី :** ជាទូទៅព្រះសង្ឃ ដែលគង់នៅក្នុងវត្តនេះមិនមែនជាមេជាង ឬក៏ជាព្រះសង្ឃដែលមានជំនាញខាងជាងសំណង់ឡើយ តែដោយសារមនសិកាទឹកចិត្តចង់ឃើញវត្តអារាមមានភាពរីកចំរើន ហើយជាពិសេស **តទៅទំព័រទី០៥**

តមកពីទំព័រទី ៤

# កិច្ចសម្ភាសន៍រវាងខ្មែរប៉ុស្ត៍ជាមួយព្រះគ្រូ...

ដើម្បីឧទ្ទិសដល់ព្រះពុទ្ធសាសនាដោយក្នុងនោះ ក៏មានពុទ្ធបរិស័ទចូលរួមផងដែរពរ ។ ហើយការធ្វើហ្នឹង គឺរៀនពីការមើលនៅស្រុកខ្មែរថា ជាងគេធ្វើយ៉ាងម៉េច គឺហាត់រៀនតាម ហើយទំរាំធ្វើបាន ដូចជាបោះពុម្ពកងចក្រធ្វើរបង ក្លោងទ្វារហ្នឹងមួយ គឺធ្វើខុសពីរបីដងពរ ។

**អ៊ុមលឿម :** ក្រៅពីការគង់នៅក្នុងវត្តសម្រាប់ជាទីសក្ការៈដល់ពុទ្ធបរិស័ទហើយនោះ តើព្រះសង្ឃបានដើរតួអ្វីខ្លះ សម្រាប់ផ្សារភ្ជាប់ជាមួយសហគមន៍ខ្មែរ ក៏ដូចជាសហគមន៍នៃជាតិសាសន៍ដទៃៗទៀតនោះ ? ហើយបច្ចុប្បន្នមានព្រះសង្ឃប៉ុន្មានអង្គគង់នៅវត្តនេះ ?

**ព្រះគ្រូរ័ត្នមុនី :** ពរសូមអរគុណ ព្រះសង្ឃដែលលោកមកគង់ស្នាក់នៅក្នុងវត្តហ្នឹង ទី១លោកជួយបំរើការងារវត្តដោយស្ម័គ្រចិត្តគោរពទៅតាមពុទ្ធា - នុញ្ញាតិ និងពុទ្ធបញ្ញត្តិ ហើយជាពិសេស គឺលោកមានឱកាសសម្រាប់សិក្សា ដើម្បីឱ្យបានចំណេះដឹងជាព្រះសង្ឃគួរគោរពបូជា និងយល់ដឹងក្នុងសង្គម ។ ហើយយើងបានចងក្រងគ្នាមានគណសង្ឃនឹងគណ-កម្មការ ដែលមានតាមលំដាប់លំដោយសហការណ៍គ្នាទាំងពីរផ្នែក គឺព្រះសង្ឃផង និងគណកម្មការផង ។ ហើយបើយើងនិយាយឱ្យចំទៅ គឺវត្តពរ ហើយវត្ត-បានដើរតួសំខាន់ក្នុងសង្គម ដូចជាបំរើផ្នែកសង្គមកិច្ចផ្នែកច្បាប់ទម្លាប់ ហើយក៏ដូចជាមានមរណៈសង្គ-ហសមាគមជាដើម ដើម្បីជួយរំលែកនូវសេចក្តីទុក្ខដោយមានថវិកាជួយដល់ក្រុមគ្រួសារសព ។ បន្ថែមពីលើហ្នឹងវត្តព្រះពុទ្ធរង្សី ត្រូវបានក្រុងហ្វីឡាដែលហ្វៀ មានចៅហ្វាយក្រុងជាដើម គាត់បានស្នើសុំឱ្យវត្តយើងហ្នឹង ជាតំណាងព្រះពុទ្ធសាសនាទាំងផ្នែកពុទ្ធសាសនាចិនក្តី ពោលគឺឱ្យតែព្រះពុទ្ធសាសនានៅក្នុងតំបន់ គឺមានតែវត្តយើងតែមួយគត់ជាតំ-ណាង ហើយការងារនៅក្នុងសាខាក្រុងមានប្រជុំទាក់ទងរឿងប្រពៃណីទំនៀមទម្លាប់សាសនាអីចឹង គេតែងនិមន្តអាត្មាឱ្យចូលរួមជាតំណាង ហើយក្រៅពីហ្នឹង ក៏បានចូលរួមជួយសម្រួលការងារខាងផ្នែកអប់រំជាមួយនឹងក្រសួងអប់រំ ហើយសហការណ៍ជាមួយអង្គការសមាគមដទៃៗទៀតក្នុងតំបន់ ។ ហើយបច្ចុប្បន្នព្រះសង្ឃគង់នៅក្នុងវត្តព្រះពុទ្ធរង្សីនេះ មានចំនួន ៨អង្គពរ ។

**អ៊ុមលឿម :** ទើបតែបានជាង៨ឆ្នាំសោះ ឃើញថា វត្ត "ព្រះពុទ្ធរង្សី" មានការវិវឌ្ឍន៍រីកចំរើនគួរឱ្យកត់សម្គាល់ តើក្នុងនាមព្រះអង្គជាគ្រូចៅអធិការក៏ដូចជាព្រះសង្ឃអង្គដទៃទៀតព្រមទាំងគណកម្ម-ការមានយុទ្ធសាស្ត្រ ឬយន្តការចម្បងបែបណា ដែលញ៉ាំងឱ្យវត្តនេះមានការរីកចំរើននឹងមានអ្នកគាំទ្រច្រើនបែបនេះ ?

**ព្រះគ្រូរ័ត្នមុនី :** ពរអរគុណ អាត្មាជឿថា គ្រប់វត្តហើយពុទ្ធបរិស័ទគ្រប់គ្នាចង់បានវត្តមួយតំណាងឱ្យសង្គមជាតិយើង ដែលមានរចនាបទនៃការកសាងក៏ដូចជាការរៀបចំគ្រប់គ្រងផ្នែកធមិអាថ៌ វិន័យព្រះពុទ្ធសាសនាក៏ដូចជាផ្នែកសំណង់ ដើម្បីបានល្អ ដូចជានៅស្រុកយើងក៏ដូចជាព្រះពុទ្ធសាសនា ដែលយើងគោរពបូជា តាំងពីណាមកមានភាពសុក្រឹត្យពរ អាត្មាជឿអីចឹង ដោយពុទ្ធបរិស័ទមានបំណងយ៉ាងហ្នឹង ហើយសម្រាប់ពុទ្ធបរិស័ទចំណុះជើងវត្តព្រះពុទ្ធរង្សីផ្ទាល់ គាត់បានបូជាកម្លាំងកាយកម្លាំងចិត្តពរ ជួយឧបត្ថម្ភទាំងផ្នែកថវិកាក្តី កម្លាំងកាយក្តី ស្មារតីក្តីក្នុងការជួយវត្តអារាម ។ ដូច្នេះ ដើម្បីឱ្យវត្តហ្នឹងរីកចំរើនទៅវត្តព្រះពុទ្ធរង្សីយើង គឺទី១ គឺរៀបចំគណ-កម្មការ ដោយមានការដឹកនាំព្រះពុទ្ធសាសនាឱ្យមានភាពសុក្រឹត្យនឹងឯករាជ្យ ដោយមិនមានការគាបសង្កត់ពីក្រុមគណកម្មការ ឬក៏ពុទ្ធបរិស័ទក្រុមណាមួយទេ ដោយគោរពនូវពុទ្ធបញ្ញត្តិ និងពុទ្ធានុញ្ញាតិ គឺច្បាប់ផ្ទៃក្នុងរបស់វត្តផង ។ ជាពិសេសគឺ យើងបានរៀបចំផ្នែកខាងហិរញ្ញវត្ថុ គឺបច្ច័យដែលញាតិញោម





បានចូលរួមកសាងហ្នឹង គឺយើងរៀបចំការពារទុកកុំឱ្យបាត់ ដោយមានហិរញ្ញិកបីនាក់ក្នុងការស៊ីញ៉េចាយពីសម្ភារៈផ្សេងៗ គឺមានរីស៊ីបមានបង្កាន់ដៃ ដោយក្នុងពេលបីខែយើងប្រជុំម្តង ក្នុងការពិនិត្យមើលលើការចំណូលចំណាយ ហើយមុននឹងចាយត្រូវមានស៊ីញ៉េពីរបីនាក់ឡើងទៅហើយបច្ច័យហ្នឹង គឺញាតិញោមចូលមួយកាក់មួយសេនតិចក្តីច្រើនក្តី គឺយើងទុកធ្វើម៉េចមិនឱ្យបាត់តែម្តង ហើយប្រាកដជាសម្រាប់កសាងនូវអ្វីដែលជាគម្រោង ដែលយើងបានដាក់មកនៅក្នុងផែនការនៃការកសាងរបស់វត្តហ្នឹង ទីមួយ ហើយទីពីរ តទៅទំព័រទី០៦

KHMER POST USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea,**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, &**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Mong Meng**

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

តមកពីទំព័រទី ៥

# កិច្ចសម្ភាសន៍វាំងខ្មែរ...

ដូចដែលបានជម្រាបមកខាងដើមព្រះសង្ឃ គឺជាស្រែបុណ្យដែលព្រះសង្ឃគ្រប់អង្គត្រូវតែគោរពនូវវិន័យរបស់ខ្លួនជាព្រះសង្ឃ បើសិនព្រះសង្ឃធ្វើនូវអ្វីមួយដែលខុសក្នុងវត្តអារាម ក៏យើងយកធម៌អាថ៌វិន័យហ្នឹងមកវិនិច្ឆ័យដែរ យើងមិនមែនវិនិច្ឆ័យទៅតាមចំណង់ចំណូលចិត្តដែលមិនមែនជាពុទ្ធសាសនាទេ ហើយជាពិសេសវត្តយើងនេះមិនឱ្យព្រះសង្ឃបើកឡាន មានយានយន្តឯកជនមិនឱ្យព្រះសង្ឃមាន TV នៅក្នុងវត្ត ហើយព្រះសង្ឃមានកិច្ចវត្តព្រឹកល្ងាចថ្វាយបង្គំព្រះរៀនធម៌អាថ៌វិន័យ ដើម្បីឱ្យសមទៅនឹងព្រះសង្ឃ ដែលគេគោរពបូជា ។ អ៊ីចឹង ខាងព្រះសង្ឃត្រូវមានវិន័យស្អាតស្អំ ផ្នែកគណកម្មាធិការមានការទទួលខុសត្រូវច្បាស់លាស់ ដោយមានការទទួលខុសត្រូវខ្ពស់ផ្នែកហិរញ្ញវត្ថុ គឺយើងបានរៀបចំទុកដាក់ដោយមានគណកម្មការគ្រប់គ្រង និងត្រួតកន្លែងប្រជុំ និងទីកន្លែងតំកល់ធាតុ ។ ក្រៅពីហ្នឹងយើងមានកុដិមួយខ្នងសម្រាប់ជាផ្ទះបាយ និងឱ្យលោកយាយ ស៊ីលវត្តិ(យាយជី)សម្រាប់ស្នាក់នៅក្នុងការប្រណិប័ត្រធម៌ ធ្វើចង្ហាន់ប្រគេនព្រះសង្ឃ ហើយយើងបានជាវអាគារ៧ល្វែងបន្ថែមទៀត ដោយបានជួសជុលរួច៩០ភាគរយហើយពរ ដូច្នេះក្នុងការជាវហ្នឹងពរសូមបញ្ជាក់ប៉ុណ្ណឹង ហើយបិទវង់ក្រចកនិងសូមចំរើនពរជម្រាបពីបញ្ហានៃការបង់ប្រចាំខែទៅ Morgage Insurance ជាដើម ដោយក្នុងមួយខែបើខែក្ដៅ វត្តយើងបង់ប្រហែលជាមួយម៉ឺនបួនពាន់ (១៤000) ទៅមួយម៉ឺនប្រាំពាន់ (១៥000) បើខែរងារមួយម៉ឺនបួន ឬមួយម៉ឺនប្រាំពាន់ហ្នឹងអត់ទៀតទេ ។ ក្នុងការបង់ហ្នឹងយើងមានការបារម្ភដែរ ដោយសារយើងនៅជំពាក់ Morgage Insurance ច្រើនពរ តែដោយសារមានពុទ្ធបរិស័ទ ញាតិញោមបានជួយតាម



ពិនិត្យមានតម្លាភាពថា គ្រប់គ្រងបាននូវទ្រព្យសម្បត្តិហ្នឹងប្រើប្រាស់ទ្រព្យសម្បត្តិ ដែលជាញើសឈាមរបស់ពុទ្ធបរិស័ទ ឱ្យចំទៅតាមគោលដៅដែលយើងចង់បានទាំងអស់ហ្នឹង គឺដោយសារការសហការណ៍រវាងព្រះសង្ឃគណកម្មការ និងពុទ្ធបរិស័ទដោយយើងមានមនសិការ រកបានទីកន្លែងវត្តអារាម ដើម្បីឧទ្ទិសដល់ព្រះពុទ្ធសាសនា ក៏ដូចជាវប្បធម៌ជាតិផងពរ ។

**អ៊ុមលឿម :** ចំពោះការជាវផ្ទះបន្ថែម កាលពីប្រមាណជាពីរឆ្នាំមុន ដែលនៅជាប់ផ្នែកខាងត្បូងនៃវិហារបច្ចុប្បន្ន តើខាងវត្តដែលមានបញ្ហាពីរឿងបងវិក័យប័ត្រ (Pay Bill) ដែរឬទេ ? ហើយក្នុងមួយខែៗ តើវត្តចំណាយប៉ុន្មាន លើការបងវិកាយប័ត្រនេះ?

**ព្រះគ្រូវ័ន្តមុនី :** ពរមុននឹងឆ្លើយនូវសំណួរហ្នឹងអាត្មារសូមបើកវង់ក្រចកជម្រាបញាតិញោមពុទ្ធបរិស័ទ ក៏ដូចជាបងដែលជាអ្នកកាសែតថា តាំងពីវត្តយើងចាប់បដិសន្ធិមក គឺវត្តនេះមិនដែលបានសម្រាកមួយថ្ងៃឡើយក្នុងការកសាង គឺកសាងរហូត ។ បច្ចុប្បន្ននេះយើងមានព្រះវិហារ ដែលមានបីជាន់ដែលអតីតជាវិហាររបស់សាសនាគ្រិស្ត ហើយយើងមានអគារមួយទៀតដែលមានបីជាន់ដែរ គឺយើងបានច្នៃកន្លែងហ្នឹងជាសាលារៀនបង្ហាត់អក្សរខ្មែរក៏ដូចជាភាសាអង់គ្លេស និងជាសាលតំកល់សព និងជារយៈការនិមន្តព្រះសង្ឃសូត្រមន្តតាមផ្ទះ និងញាតិញោមបូជាវិភាគទានជាប្រចាំ គឺយើងអាចរត់ទៅរួចទោះបីថា យើងនៅមានការខ្វះខាតយ៉ាងណាក៏ដោយ តែអាចទៅរួចល្មមនឹងដើរទៅមុខបានដោយញាតិញោមបានជួយ តែយើងបារម្ភក្រែងពេលខ្លះអត់មានបុណ្យទានអ៊ីចឹង គឺអត់មានចំណូលសម្រាប់បង់ប្រចាំខែ ហើយយើងនៅជំពាក់គេហាសិបម៉ឺនទៀតផង ។ ហើយក្រៅពីហ្នឹង យើងទើបបានជាវដីថ្មីមួយកន្លែងដែរពរ ជាង១០ហិកតារ៉េហើយយើងគិតជាហិកតាប្រហែលជាប្រាំ ឬប្រាំហិកតាជាង នៅ៤០នាទីពីវត្តបច្ចុប្បន្ន ដែលយើងមានគម្រោងចង់កសាងជាពុទ្ធមណ្ឌល ដើម្បីផ្សាយវប្បធម៌ព្រះពុទ្ធសាសនាទៅដល់បរទេសផង ។ ដូច្នេះសូមចំរើនពរជម្រាបបងសារជាថ្មីថា យើងមានការខ្វះខាតហើយបារម្ភដែរ បើសិនណាអត់មានពុទ្ធបរិស័ទ អត់មានបុណ្យទាន គឺយើងមានបញ្ហាបង់ប្រចាំខែដែរ តែយើងមានបច្ច័យបំរុងបីបួនម៉ឺន ឬក៏ប្រាំម៉ឺនទុកក្នុង Bank សម្រាប់បណ្ដោះបានមួយខែពីរខែដែរ បើសិនណាអត់មានបុណ្យទានពរ ។

**អ៊ុមលឿម :** ខ្ញុំកូណា បានឮពាក្យចចាមអារាមថា នៅពេលខាងមុខវត្តនឹងដាក់ជណ្ដើរយន្តនៅវិហារផ្នែកខាងត្បូង ដែលទើបតែជាវកាលពីប្រមាណ ជាពីរឆ្នាំមុន ដែលមានជាងកំពុងជួសជុលពុំទាន់រួច តើដំណឹងនៃការដាក់ជណ្ដើរយន្ត **តទៅទំព័រទី០៧**

តមកទំព័រទី ៦

# កិច្ចសម្ភាសន៍វាងខ្មែរ...

ហ្នឹងពិត ដូចពាក្យចចាមអារាមទាំងហ្នឹង ដែរទេ?

**ព្រះគ្រូចៅអធិការ :** ជណ្តើរយន្តវាមាននៅទីហ្នឹងស្រាប់ពរ យើងមិនបានកសាងថ្មីទេដូច្នេះ គឺយើងមានបំណងចង់ធ្វើឱ្យទំនើបទៅតាមសម័យបច្ចុប្បន្ន ព្រោះជណ្តើរយន្តហ្នឹងជា របស់បុរាណ តែនៅប្រើបាន ហើយបើសិនយើងធ្វើបាន គឺងាយស្រួលដល់ ញាតិ ញោម ដែលយកចង្ហាន់ទៅជាន់ទីពីរ ពីព្រោះនៅពេលយើងកសាងរួចហើយ នៅជាន់ទីពីរហ្នឹង គឺជាសាលាបុណ្យដែលព្រះសង្ឃលោកគង់ឆាន់ ហើយជាន់ខាងក្រោមទីមួយ យើងរៀបចំជាតុ កៅអី ឱ្យញាតិញោមអង្គុយពិសារបាយឱ្យបានងាយស្រួល នៅពេលមានបុណ្យទាន ហើយបើសិនណានៅជាន់ទីពីរ វាខ្ពស់ញាតិញោមចាស់ៗគាត់អាចឡើងតាមជណ្តើរយន្តដោយងាយស្រួលបាន ។



**អ៊ុំមលឿម :** តាមសភាពជាក់ស្តែង ខ្ញុំកូណាសង្កេតឃើញថា ផ្នែកខ្លះនៃវត្ត "ព្រះពុទ្ធរង្សី" កំពុងតែជួសជុលបន្ថែម ដូចជានៅជាន់ទីមួយ ទីពីរនឹងទីបីជាដើមហ្នឹង តើពេលណាទើបរួចរាល់ជាស្ថាពរ ហើយសាលទីមួយៗសម្រាប់ធ្វើអ្វីខ្លះដែរ?

**ព្រះគ្រូវ័ត្តមុនី :** អាគារថ្មីដែលយើងទើបជាវហ្នឹងធំអាចដាក់មនុស្សបានរាប់ពាន់នាក់ ហើយបំណង គឺជាន់ខាងក្រោម ជាទីកន្លែងសម្រាប់ញាតិញោម ទទួលភោជនាហារពេលបុណ្យទាន ហើយយើងអាចធ្វើជា កន្លែងប្រជុំក៏បានពេលមានសមាគម ឬអង្គការ ឬក៏គណបក្សណា ជាពិសេសនៅវត្តយើងហ្នឹងមានសាលាក្រុង មានក្រសួងអប់រំគេមកខ្ចីទីកន្លែងសម្រាប់ប្រជុំម្តងម្កាលដែរ អាចរៀបចំកៅអី ដែលមានចំណុះប្រាំ ប្រាំមួយរយ ឬមួយពាន់ក៏មិនចង្អៀតដែរ ។ ហើយយើងមានបង្ហាត់របាំដែរ អ៊ីចឹងយើងមានទីកន្លែងសម្រាប់បង្ហាត់របាំ ។ ចំណែកជាន់ទីពីរ ធ្វើជាសាលាបុណ្យសម្រាប់ព្រះសង្ឃទទួលញាតិញោមពុទ្ធបរិស័ទ ពេលមកបុណ្យមានអសនៈព្រះពុទ្ធបដិមាដើម្បីគោរពបូជា ហើយមានគំនូរពុទ្ធប្រវត្តិ ដូចជានៅស្រុកខ្មែរយើង គេគូសទៅតាមព្រះវិហារ ។ ជាន់ទីបី មានកន្លែងសាលប្រជុំសម្រាប់សហគមន៍សង្ឃ ឬក៏ប្រជុំគណកម្មការ តទៅទំព័រទី០៩

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី០២ ខែកញ្ញា ឆ្នាំ២០១១

# ហាមឃាត់ក្រុមហ៊ុនចំនួន៩មិនឱ្យពាក់ព័ន្ធនឹងគម្រោងរបស់រដ្ឋដោយសារការមិនបង់ពន្ធ

ដោយ : ផាន់ អាណា

THE CAMBODIA DAILY

ក្រុមមន្ត្រីរដ្ឋាភិបាលនិងតំណាងក្រុមហ៊ុនពាក់ព័ន្ធបាននិយាយកាលពីថ្ងៃព្រហស្បត៍ថា កាលពីខែសីហាក្រសួងហិរញ្ញវត្ថុបានហាមប្រាមក្រុមហ៊ុនក្នុងស្រុកចំនួន៩មិនឱ្យពាក់ព័ន្ធនិងគម្រោងហេដ្ឋារចនាសម្ព័ន្ធរបស់រដ្ឋមួយចំនួនទៀតឡើយដោយសារការមិនបង់ពន្ធលើគម្រោងមួយចំនួនដែលផ្តល់មូលនិធិដោយបរទេស ។

ចំណាត់ការរបស់លោក គាត ឈន់ រដ្ឋមន្ត្រីក្រសួងហិរញ្ញវត្ថុក្នុងបង្កកមូលនិធិបរទេសសម្រាប់គម្រោងមួយចំនួនរបស់ខ្លួន និងការហាមឃាត់ក្រុមហ៊ុនទាំងនោះ មិនឱ្យចូលរួមដេញថ្លៃគម្រោងរបស់រដ្ឋនៅពេលខាងទៀតនេះ គឺធ្វើឡើងតាមសំណើមួយរបស់អគ្គនាយកនៃអគ្គនាយកដ្ឋានពន្ធដា ដែលកាលពីថ្ងៃទី១១ខែសីហាបានផ្ញើលិខិតមួយច្បាប់ទៅលោក គាត ឈន់ ដោយជម្រាបលោកថា ក្រុមហ៊ុនសំណង់ចំនួន៩មិនបានបង់ពន្ធម្តងហើយម្តងទៀត ។

លោក ស៊ឹម អ៊ាង ជាប្រធាននាយកដ្ឋានពន្ធដារបានជម្រាបលោក គាត ឈន់ តាមរយៈលិខិតនោះថា...ក្រុមហ៊ុនទាំង៩នោះបានប្រកាសថាខ្លួន អសកម្ម ឬបានបង់ពន្ធតិចតួចបំផុត ហើយបានបដិសេធមិនសហការជាមួយអគ្គនាយកដ្ឋានពន្ធដារក្នុងការធ្វើសវនកម្ម ទេ ដោយព្យាយាមរកលេះដើម្បីគេចវេះពីការបង់ពន្ធ ដែលបណ្តាលឱ្យយើងសម្រេចបិទក្រុមហ៊ុនទាំងនេះចោលតែម្តង" ។

លិខិតដដែលនេះបន្តថា តទៅទំព័រទី១៥

# Nine Companies Barred From State Projects for Not Paying Taxes

By Phann Ana

THE CAMBODIA DAILY

The Ministry of Finance in August barred nine local companies from working on government infrastructure projects for allegedly failing to pay tax owed on several projects funded by foreign money, government and company officials said yesterday.

The move by finance Minister Keat Chhon to freeze foreign funding of their projects and bar the companies from bidding for future government projects was based on a request by the director general of the General Department of Taxation, who on Aug 11 sent a letter informing Mr Chhon that nine construction companies had repeatedly failed to pay tax.

"The general department of taxation has uncovered that...those [nine] enterpises have announced that they are inactive or have paid so little tax and refused to cooperate with the General Department of Taxation to conduct an audit by trying [to] make an excuse to escape taxes, leading us to shutdown the companies," Sim Eang, the tax department head, told Mr Chhon in the letter.

"In order to have the companies cooperate better with audits and returns to properly fulfill the obligation of inventory tax, the General Department of Taxation would like to request Your Excellency Deputy Prime Minister and Ministry of Economics and Finance to please postpone the payment of money for implementing projects," the letter continues.

Continued to page 15

# អ្នកគាំទ្រសមាគមន៍បុរីកីឡាចោទក្រុមហ៊ុនផានអ៊ីមិចថា បានឃុំខ្លួនមនុស្សខុសច្បាប់

ដោយ : ភោគ ដន

THE CAMBODIA DAILY

តំណាងមួយរូបនៃសហគមន៍បុរីកីឡានៅរាជធានីភ្នំពេញបានឱ្យដឹងថា លោកត្រូវបានឃុំខ្លួនជាបណ្តោះអាសន្នកាលពីម្សិលមិញដោយនគរបាល និងភ្នាក់ងារសន្តិសុខរបស់ក្រុមហ៊ុនអភិវឌ្ឍន៍អចលនទ្រព្យផានអ៊ីមិច ហើយត្រូវបានបង្ខំឱ្យផ្តិតមេដៃលើឯកសារមួយដែលទទួលស្គាល់ថា ខ្លួនបានធ្វើខុស ។

លោក សុង សឿន ដែលជាសកម្មជនម្នាក់របស់សហគមន៍នេះបានមានប្រសាសន៍ថា កាលពីម្សិលមិញវេលាម៉ោងប្រហែល៨ព្រឹកលោកកំពុងប្រមូលស្នាមមេដៃរបស់ក្រុមអ្នកភូមិដែលស្ថិតនៅជិតតំបន់អភិវឌ្ឍន៍នេះ ស្រាប់តែត្រូវមន្ត្រីនគរបាលនិងក្រុមឆ្មាំសន្តិសុខរបស់ក្រុមហ៊ុនផានអ៊ីមិចប្រហែលជា១០រូបបានឃាត់ខ្លួន ហើយបាននាំខ្លួនលោកទៅកាន់ការិយាល័យរបស់ក្រុមហ៊ុននេះ ទីដែលលោកត្រូវបានឃុំខ្លួនរយៈពេលប្រហែល៥ម៉ោង ។

លោក សឿន បាននិយាយថា "ពួកគេបានចាក់សោខ្ញុំទុកនៅក្នុងការិយាល័យរបស់ក្រុមហ៊ុនផានអ៊ីមិច ។ ពួកគេរឹបអូសយកទូរស័ព្ទដៃរបស់ខ្ញុំពី ព្រោះពួកគេមានការភ័យខ្លាចថា ខ្ញុំនឹងទូរស័ព្ទហៅក្រុមអ្នកសារព័ត៌មាន ឬក្រុមសិទ្ធិមនុស្ស" ។ តទៅទំព័រទី១៥

# Borei Keila Advocate Accuses Phanimex of Illegal Detention

By Phok Dorn

THE CAMBODIA DAILY

A representative of Phnom Penh´s Borei Keila community said he was temporarily detained yesterday by police and security personnel from land developer Phanimex, and forced to thumbprint a document admitting wrongdoing.

Song Soeun, a community activist, said that at about 8 am yesterday, he was collecting villagers´ thumbprint near the development site when about 10 police officers and Phanimex security guards stopped him and took him to the company´s offices, where he was detained for about five hours.

"They locked me inside the Phanimex office," Mr Soeun said. "They confiscated my phone, because they were afraid I´d call press or human rights groups."

During the detention, Phanimex chairwoman Suy Sophan allegedly threatened Mr Soeun with jail if he did not apologize to the company and thumbprint a document saying that comments he made at a community prayer ceremony on Wednesday were false.

"I had to apologize to the company and promise to stop encouraging anarchy among the villagers. They forced me to thumbprint the document, saying that if I dit not comply, I would be sent to Prey Sar prison," Mr Soeun said.

Ms Sophan denied that her company had Continued to page 15

# កងទ័ពឥណ្ឌាធ្វើការហ្វឹកហាត់រក្សាសន្តិភាពសម្រាប់ទាហាននៃកងយោធពលខេមរភូមិន្ទ

ដោយ : PHILIP HELJMANS

THE CAMBODIA KAILY

ក្រុមហ៊ុនឥណ្ឌាបាននិយាយថា កងទ័ពឥណ្ឌាកាលពីសប្តាហ៍មុនបានចាប់ផ្តើមវគ្គបំពាក់បំប៉នផ្នែកដោះមីនរយៈពេលបីសប្តាហ៍មួយសម្រាប់ទាហានកងទ័ពយោធពលខេមរភូមិន្ទចំនួនជាង២៥០នាក់ ។

លោកវរសេនីយ៍ត្រី Dinesh Singh នៃកងឥណ្ឌាទទួលផ្នែកហ្វឹកហាត់នេះ បានមានប្រសាសន៍ថា ទាហានឥណ្ឌាចំនួន៣៧នាក់ បច្ចុប្បន្នកំពុងបង្រៀនបច្ចេកទេសដែលយល់ព្រមដោយអង្គការសហប្រជាជាតិសម្រាប់ការដោះមីនជាផ្នែកនៃកិច្ចព្រមព្រៀងមួយរវាងប្រទេសទាំងពីរ ។

លោកវរសេនីយ៍ត្រី Dinesh Singh បានមានប្រសាសន៍កាលពីថ្ងៃអង្គារនេះថា "ជាសំខាន់ការហ្វឹកហាត់នេះនឹងត្រូវអនុវត្តជាបីដំណាក់កាល ។ ដំណាក់កាលទីមួយ គឺក្បួនដោះមីន ទីពីរការកំណត់គ្រាប់មីនកប់ក្នុងដី និងទីបីការរៀបចំដោះមីន" ។

លោកបានមានប្រសាសន៍បន្ថែមទៀតថា ការបំពាក់បំប៉នដែលចាប់ផ្តើមកាលពីថ្ងៃសៅរ៍កំពុងតែធ្វើនៅក្នុងមជ្ឈមណ្ឌលជាតិសម្រាប់កងទ័ពរក្សាសន្តិភាពបោសសម្អាតមីន និងយុទ្ធភណ្ឌបន្សល់ទុកពីសម័យសង្គ្រាមនៅក្នុងខេត្តកំពង់ស្ពឺ ។

លោកបានមានប្រសាសន៍ថា "មកដល់ពេលនេះយើងបានធ្វើការបំពាក់បំប៉ននេះជារៀងរាល់ឆ្នាំចាប់តាំងពីឆ្នាំ២០០៧មក" ។

លោក សូរ៉ាវ រ៉េ លេខាទីមួយនៅស្ថានទូតឥណ្ឌាបានមានប្រសាសន៍ថា ការហ្វឹកហាត់នេះគឺជាប្រយោជន៍សម្រាប់ប្រទេសទាំងពីរ ។

លោកបានមានប្រសាសន៍ថា "នេះជាផ្នែកមួយនៃកិច្ចខិតខំប្រឹងប្រែងទ្វេភាគីមួយ ដើម្បីជួយកាត់បន្ថយចំនួនគ្រោះ និងដើម្បីដោះស្រាយបញ្ហាមីននៅក្នុងប្រទេសកម្ពុជា ៕

# Indian Army Conducting Demining Training Course

The Indian army last week began a three-week demining training course for more than 250 RCAF soldiers, Indian officials said. Major Dinech Singh of the Indian army, who is in charge of the training, said 37 Indian army personnel are currently teaching UN-sanctioned techniques for demining, as part of an agreement between the two countries. "Basically, the training will be done in three steps. First is the procedure for demining, then it is identification of landmines and then preparing for demolition," he said Tuesday, adding that training is taking place at the National Center for Peacekeeping Forces, Mines and Explosive Remnants of War Clearance in Kompong Speu province. The training started on Saturday. "So far, we have done this every year since 2007," he said. Saurav Ray, first secretary at the Indian Embassy, said the exercise was beneficial for both India and Cambodia. "This is a part of a bilateral effort to help reduce the amount of casualties and to tackle the mining issue in Cambodia," he said. (Philip Heijmans)

តមកពីទំព័រទី ៧

# កិច្ចសម្ភាសន៍វាំងខ្មែរ...

ដែលមានគ្នាច្រើន ដោយយើងតុងតែងបានល្អ និងមានបន្ទប់សម្រាប់ព្រះសង្ឃធ្វើសមាធិគង់នៅផងដែរពរ ។

**អ៊ុមលឿម :** ក្រៅពីមានដី១០ហិកតាំរនៅក្រៅក្រុងហើយនោះ តទៅអនាគត តើវត្តព្រះពុទ្ធរង្សីមានគម្រោងចង់ពង្រីកនូវវិសាលភាពរបស់ខ្លួនឱ្យកាន់តែច្រើន និងទូលំទូលាយជាងនេះទៀតដែរទេ?

**ព្រះគ្រូវិត្តមុនី :** ពរសូមអរគុណ និយាយរួមទៅគឺយើង ចង់ឱ្យព្រះពុទ្ធសាសនាសុះសាយនៅក្នុងប្រទេសអាមេរិកពរ គឺមិនមែនសម្រាប់វត្តព្រះពុទ្ធរង្សី ទេ តែសម្រាប់ព្រះពុទ្ធសាសនារបស់យើងទាំងអស់គ្នា អ៊ីចឹងអាត្មាគិតថា វាសនាជាឱកាសល្អសម្រាប់ញាតិញោម ពុទ្ធបរិស័ទ ដែលចង់ធ្វើបុណ្យសន្សំកុសល ហើយចង់ពង្រីកព្រះពុទ្ធសាសនា ជាមួយគ្នា ។ នៅដីដែលហួស The king of Prussia ហ្នឹងមានជាង ១០ ហិកតារ ដែលយើងមានគម្រោងចង់ធ្វើជាពុទ្ធមណ្ឌល ។ ពុទ្ធមណ្ឌលហ្នឹង គឺយើងកសាងពុទ្ធប្រវត្តិ ដោយមានរូបសំណាកទាក់ទងនឹងដំណើរព្រះពុទ្ធប្រសូត្រ ព្រះពុទ្ធកសាងបារមី ដើម្បីបានត្រាសជាព្រះពុទ្ធ និងផ្សេងៗជាច្រើនទៀត ។ ក្រៅពីហ្នឹងយើងមាន កសាងរូបចម្លាក់ ដូចជាប្រាសាទអង្គរវត្ត ព្រះបាទជ័យវរ្ម័នទី៧ និងទាក់ទងនៅនឹងវប្បធម៌ប្រវត្តិសាស្ត្ររបស់យើងពរ យើងមានដីធំ យើងអាចកសាងរូបចម្លាក់បានច្រើន ប៉ុន្តែសូមចំរើនពរជម្រាបញាតិញោមថា យើងមិនដឹង ឬមិនអាចកំណត់ថា នឹងចាប់ផ្តើមនៅពេលណាទេ ព្រោះសំខាន់គឺចង់កសាងវត្តក្នុងក្រុងនេះឱ្យបានរួចរាល់ជាស្ថាពរ ទាំងអគារថ្មី ទាំងអគារចាស់ ដែលយើងនៅកំពុងជួសជុល ហើយនឹងធ្វើរបងបន្ថែមទៀត ។ អ៊ីចឹងបន្ទាប់ពីយើងកសាង ជួសជុលនឹងសងថ្លៃជំពាក់បំណុលសព្វគ្រប់ហើយ ទើបយើងចាប់ផ្តើមទៅកសាងពុទ្ធមណ្ឌល ដូច្នេះពុទ្ធមណ្ឌលហ្នឹងនឹងមានការកសាងធំ ដែលនៅអាមេរិក មិនដែលមាន ឬមិនធ្លាប់បើយើងធ្វើហ្នឹងជាលើកទីមួយហើយពរ...។

**អ៊ុមលឿម :** កូណាសូមអរគុណ ចំពោះការពន្យល់ដ៏ក្បោះក្បាយទាន ហើយបើតាមកូណាសង្កេតឃើញជាក់ស្តែង គឺវត្ត "ព្រះពុទ្ធរង្សី" មានលក្ខណៈខុសប្លែកពីវត្តនានានៅក្នុងតំបន់ហ្វីឡានេះ ការខុសប្លែកនោះ គឺវត្តមានដាក់តាំងរូបគ្រុឌ ហង្ស.រាជសីុ.តោ...ជាដើម ដែលមើលទៅហាក់ជាទីចាប់ចិត្តជិតអារម្មណ៍ដល់អ្នកធ្វើចរាចរឆ្លងកាត់យ៉ាងខ្លាំង តើរូបចម្លាក់ទាំងអស់ហ្នឹងយើងបានពីណាមកដែរ?

**ព្រះគ្រូវិត្តមុនី :** សូមចំរើនពរ ជម្រាបញាតិញោមថា វត្តយើងតាំងពីយើងផ្តើមយើងមិនដែលយករូបបដិមាដូចជាព្រះពុទ្ធ ឬក៏រចនាបទ ដូចជាតោ ឬក៏ការតុបតែងនៅក្នុងវត្តហ្នឹងពីប្រទេសដទៃទេពរ គឺយើងដឹកមកពីខ្មែរសុទ្ធសាធ ដែលមានរចនាបទ ជាខ្មែរសុទ្ធសាធ ។ ហើយជាទូទៅ រូបទាំងអស់ហ្នឹងមានតម្លៃណាស់ពរ ពីព្រោះយើងឱ្យជាងកសាងពីថ្មធម្មជាតិសុទ្ធសាធ ដូចជាថ្មកែវ ថ្មភក់ ថ្មអង្គរ ដែលមានតម្លៃរាប់ពាន់ រាប់ម៉ឺនដុល្លារទៀតពរ ។

**អ៊ុមលឿម :** បច្ចុប្បន្នឃើញថា កូនខ្មែរភាគច្រើន ដែលកំពុងរស់នៅក្នុងសហគមន៍ហ្វីឡាដែលហៀរយើងនេះហាក់ពុំសូវចាប់អារម្មណ៍ ជាមួយនឹងភាសាកំណើតរបស់យើងឡើយ តទៅទំព័រទី ១១

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន




**ដោយ : ម៉ម យ៉ឺន**

●●●លើកទង់ជ័យសជាសញ្ញាបញ្ចប់ការប្រយុទ្ធគ្នា នៅវេលាម៉ោង ១២១អាធ្រាត្រ ថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥ ។

គ្រាន់តែប្រកាសនេះបានចប់ទៅកងទ័ពព្រៃខោអាវខ្មៅបង់កក្រមារបានវាយសន្ទប់យ៉ាងខ្លាំង ដោយបាញ់គ្រប់ផ្លោងយ៉ាងទ្រហឹងអឹងអាប់ស្រោចទៅក្នុងទីក្រុងភ្នំពេញ ដូចទឹកភ្លៀង ដើម្បីឱ្យកងទ័ពព្រៃថ្មើរជើងដើរចូលមកក្នុងទីក្រុងទាំងខ្សែៗពីគ្រប់ទិសទីទាំងអស់ ។

ចំណែកកងទ័ពជាតិទាំងអស់ បានចាកចេញពីទីតាំងទ័ពរៀងៗខ្លួន នៅវេលាម៉ោង៥ភ្លឺ ថ្ងៃទី១៧ ខែមេសា ឆ្នាំ១៩៧៥ សំដៅទៅផ្ទះសម្បែងរបស់ខ្លួនជួបជុំគ្រួសារខ្លួនវិញ ។

**ហេតុការណ៍កើតមាននៅពេលមានពន្លឺសន្តិភាព ?**

នៅព្រឹកថ្ងៃទី១៧ មេសា ១៩៧៥នោះហើយដែលសន្មតថា ជាថ្ងៃបញ្ចប់សង្គ្រាមនៅប្រទេសខ្មែរ ដើម្បីបញ្ចប់ទុក្ខវេទនា និងឧប្បត្តិហេតុផ្សេងៗ ដែលកើតមានមកលើប្រជាពលរដ្ឋខ្មែរ មានន័យថា ពន្លឺនៃសន្តិភាពបានរះឡើងហើយ ហើយប្រជាពលរដ្ឋខ្មែរមានសេចក្ដីសប្បាយរីករាយ ហើយសង្ឃឹមថានឹងបានរស់នៅយ៉ាងសុខសាន្តតទៅ ចាប់តាំងពីថ្ងៃទី ១៧ មេសា ១៩៧៥នេះតទៅ ។

តើបន្ទាប់ពីក្រោយថ្ងៃទី១៧ ខែមេសានេះទៅជីវិតប្រជាពលរដ្ឋខ្មែរ ត្រូវបានទទួលនូវភ័ព្វសំណាងយ៉ាងដូចម្ដេច ? ជាសេចក្ដីសុខសាន្ត ឬសេចក្ដីទុក្ខវេទនាឡើងវិញម្ដងទៀត ?

បើតាមសេចក្ដីប្រកាសរបស់មេដឹកនាំកងទ័ពព្រៃ ដែលត្រូវបានទទួលជ័យជំនះថ្ងៃទី១៧ មេសា បានថ្លែងថា សង្គ្រាមបានបញ្ចប់ទៅហើយ ដោយសារកម្លាំងកងទ័ពខ្មែរក្រហមដ៏មហិមា គឺឈ្នះដោយកម្លាំងចុងអាវុធ ដូច្នេះ សន្តិភាពនៅក្នុងប្រទេសខ្មែរបានកើតឡើងវិញហើយ ។ ការដឹកនាំ និងការគ្រប់គ្រងប្រទេសជាតិ ត្រូវបានកងទ័ពបដិវត្តន៍ខ្មែរកាន់កាប់ទាំងស្រុង និងធ្វើឱ្យប្រទេសបានបន្តការដឹកនាំទៅតាមមាគ៌ាដ៏ត្រចះត្រចង់របស់បក្សប្រជាជនបដិវត្តន៍ខ្មែរដ៏មហិមាតទៅ ដើម្បីបដិវត្តប្រទេសខ្មែរឱ្យទៅដល់គោលដៅនៃរបបសង្គមនិយមដ៏មហិមាដូចជាប្រទេសសង្គមនិយមនានាដែរ ។

ចំណែកប្រជាពលរដ្ឋខ្មែររស់នៅទីក្រុងទាំងអស់ និងតាមស្រុកភូមិដែលនៅក្រោមការត្រួតត្រា បនក្សថជាតិ លន់ នល់ សិរិមតៈ ត្រូវតែជម្លៀសចេញពីទីលំនៅមួយរយៈតូច ដើម្បីទុកឱកាសឱ្យកងទ័ពបដិវត្តន៍ ធ្វើការបោសសំអាតខ្មាំងសត្រូវ ឱ្យវាចេញអស់ពីទីក្រុង ខេត្ត ស្រុក ភូមិ លុះបានស្រួលបួលហើយនឹងអនុញ្ញាតឱ្យប្រជាពលរដ្ឋវិលត្រឡប់មកកាន់ផ្ទះសម្បែងជាទីលំនៅរបស់ខ្លួនវិញ ។

តើសេចក្ដីប្រកាសនេះពិតប្រាកដមែនឬទេ ?

ដោយសារតែសេចក្ដីប្រកាសនេះ ប្រជាពលរដ្ឋទាំងអស់ ត្រូវតែរៀបចំឥវ៉ាន់ ប្រមែប្រមូលក្រុមគ្រួសារ ដើម្បីចាកចេញពីទីលំនៅ នៅព្រឹកថ្ងៃទី១៨ មេសា ១៩៧៥នោះ ទៅតាមច្រកផ្លូវដែលកម្មាភិបាលបក្សបានដាក់ទិសឱ្យចេញដើរទៅ ។

ពេលនោះសេចក្ដីទុក្ខក្រៀមក្រំបានកើតមាននៅក្នុងចិត្តប្រជាពលរដ្ឋម្ដងទៀត ដោយគិតថាវាសនាខ្លួនពុំដឹងទៅជួបសភាពការណ៍ដូចម្ដេចទៀតទេ នៅពេលដែលគេបណ្ដេញឱ្យចេញពីលំនៅក្នុងទីក្រុង ហើយឱ្យទៅរស់នៅទីជនបទដាច់ស្រយាលដូច្នេះ ? ។

ការធ្វើដំណើរចេញទៅសង្កេតឃើញ មនុស្សប្រជ្រៀតគ្នាកកកុញនៅតាមផ្លូវច្រកចេញនីមួយៗ ស្ទើរតែឈានជើងដើរពុំរួចទេ រីឯអាកាសធាតុក៏បានបញ្ចេញកំដៅយ៉ាងក្ដៅបំផុតដែរ នៅក្នុងរដូវប្រាំងក្រោយថ្ងៃចូលឆ្នាំថ្មីខែចេត្រនោះ ។

នៅតាមដងផ្លូវបណ្ដាជនដើរពេញផ្លូវទាំងអស់ ដោយមានយកជាប់នឹងខ្លួននូវរបស់របរ និងម្ហូបអាហារបន្តិចបន្តួចប៉ុណ្ណោះ ជនខ្លះមានរទេះកង់ ខ្លះមានរទេះអូស ខ្លះមានរទេះគោ រទេះសេះ ខ្លះមានរថយន្តតូច បានផ្ទុកនូវរបស់របរម្ហូបអាហារសម្រាប់នៅតាមផ្លូវធ្វើដំណើរ ។

ដំណើរដោយសន្សឹមៗបានរសាត់ចេញទៅឆ្ងាយបន្តិចម្ដងៗ លុះពេលយប់មកដល់ក៏នាំគ្នាឈប់សម្រាករង់ចាំពេលភ្លឺឡើង នឹងធ្វើដំណើរតទៅទៀត ។

នៅតាមផ្លូវធ្វើដំណើរបណ្ដាជនទាំងនោះត្រូវបានកងទ័ពបដិវត្តន៍ជាក្រុមៗឈរចាំឆែកឆេរ បើបណ្ដាជនណាដែលមានបើករថយន្តយកទៅជាមួយ ដើម្បីពិនិត្យរកមើលភស្ដុតាង បញ្ជាក់អំពីបុណ្យសក្តិ មុខតំណែងជាទាហានក្ដីជាស៊ីវិលក្ដីដូចជាកាំភ្លើងខ្លី ឬឯកសារសំខាន់បញ្ជាក់ពីសមត្ថភាពបណ្ដាជននោះ។



បើកាលណា ឃើញមានភស្ដុតាងដែលគេត្រូវរកនោះហើយកងទ័ពបដិវត្តន៍ត្រូវចាប់ខ្លួនជននោះភ្លាម ហើយនាំទៅកាន់ទីបញ្ជាការទ័ពភ្លាមដែរ ដោយមិនឱ្យដឹងថា យកទៅទីណាទេ រួចហើយបាត់ខ្លួនតាំងពីពេលនោះដែរ ដែលសន្មត់ថា ត្រូវសម្លាប់ចោលទៅហើយ ។ មានបណ្ដាជនត្រូវសង្ស័យ ហើយត្រូវបាត់ខ្លួនរបៀបនេះ ច្រើនសន្ធឹកសន្ធាប់ណាស់ **តទៅលេខក្រោយ**

តមកពីទំព័រទី ៩

# កិច្ចសម្ភាសន៍រវាងខ្មែរ...

ពោល គឺតាំងពីការនិយាយការសរសេរ និងការអានជាដើមក្នុងនោះតើវត្ត "ព្រះពុទ្ធ រង្សី" មានកម្មវិធីអប់រំ ឬបង្រៀនអក្សរខ្មែរដល់ក្មេងៗជំនាន់ក្រោយទាំងនោះ ដើម្បីកុំឱ្យពួកគាត់ភ្លេចអស់នូវភាសាជាតិខ្លួនដែរ ឬទេ ?

**ព្រះគ្រូវ័ន្នមុនី :** ពរសូមអរគុណម្តងទៀត ចំពោះបញ្ហានេះវត្តបានធ្វើដែរ គឺបានបើកសាលាបង្រៀនអក្សរខ្មែរ តែដោយសារមួយរយៈពេលនេះសិស្សបានចូលកងវិញហើយក៏បានផ្អាកមួយរយៈ ហើយនឹងបន្តចាប់ផ្តើមទៀត ។ ក្រៅពីហ្នឹងវត្តក៏បានជួយជំរុញឱ្យឪពុកម្តាយដែលជាអ្នកគ្រប់គ្រងកូនចៅដាស់តឿនកូនចៅឱ្យមានទឹកចិត្តយកចិត្តទុកដាក់ការរៀនអក្សរ ក៏ដូចជាភាសានៅទីកន្លែងណាដែលមានបង្ហាត់ភាសាខ្មែរក្រៅពីវត្តពុទ្ធរង្សី ហើយនៅវត្តនេះសប្បាយរីករាយនឹងជួយឱ្យតែមានអ្នកចង់រៀន ។

**អ៊ុំលឿម :** នៅក្នុងសហគមន៍ខ្មែរ នៃទីក្រុងហ្វីឡាដែលហៀវយើងនេះ ជាសហគមន៍ដ៏តូចចង្អៀតមួយ ប៉ុន្តែមានវត្តខ្មែររហូតដល់ទៅបួនវត្តឯណោះ ហើយទន្ទឹមនឹងនេះដែរក៏ធ្លាប់មានការដំណាលតៗគ្នាពីមជ្ឈដ្ឋានមួយ



ចំនួនថា ហេតុអីចាំបាច់មានវត្តច្រើនអ៊ីម្លេះ ម៉េចបានជាគេមិនបង្កើតតែវត្តមួយបានហើយ ចំពោះការលើកឡើងបែបនេះ តើព្រះតេជគុណមានទស្សនៈផ្ទាល់ព្រះអង្គយ៉ាងណាដែរ?

**ព្រះគ្រូវ័ន្នមុនី :** សម្រាប់អាត្មា បើសិនវត្តទាំងបីទាំងបួនហ្នឹងរួមគ្នាបង្កើតវត្តតែមួយ គឺបានពរវត្តព្រះពុទ្ធរង្សីហ្នឹងមិនធ្វើជាការលំបាក ឬជាវត្តមួយនៃការស្វះដំណើរនៃការរួបរួមមិនតែប៉ុណ្ណោះសម្រាប់អាត្មា បើសិនជាមានការព្រមព្រៀង គឺសុខចិត្តលក់វត្តអារាមដែលមានយកទៅបង្រួបបង្រួមបានវត្តតែមួយ ។ ហើយអាត្មាគិតថា បើធ្វើអីចឹងបាន គឺល្អណាស់ ។

**អ៊ុំលឿម :** ចុងបញ្ចប់ តើតេជគុណមានសង្ឃដីការអ្វីសម្រាប់ជាសារដល់ពុទ្ធិកជននៅគ្រប់ច្រកល្ហកទាំងអស់?

**ព្រះគ្រូវ័ន្នមុនី :** ទោះបីថា វត្តព្រះពុទ្ធរង្សីកំពុងតែរីកចំរើន ហើយរីកចំរើនទៅដល់កម្រិតណាក៏ ដោយតែយើងទាំងអស់គ្នាសូមកុំភ្លេចថា ទីកន្លែងនេះជាកន្លែងសម្រាប់ឧទ្ទិសដល់ពុទ្ធសាសនាវប្បធម៌ ដូច្នេះយើងរួមគ្នាកសាងនេះបានកុសលផង ទុកជាកេរ្តិ៍ដំណែលមរតកនិងជាមោទនភាពរបស់សង្គមយើងផង ដូច្នេះទោះបីថាយ៉ាងណាក៏ដោយអ្វីដែលអាត្មាចង់ឃើញជាគំនិតផ្ទាល់ខ្លួន គឺចង់ឃើញសង្គមមួយដែលមានការរួបរួមគ្នាចង់ឃើញសង្គមមួយដែលមិនមានការប្រកាន់គ្នារស់នៅប្រកបដោយសាមគ្គីធម៌ មានមេត្តា ករុណាចំពោះគ្នាទៅវិញទៅមក ។ ហើយសម្រាប់អាត្មាផ្ទាល់ បើសិនណាសង្គមយើងអាចរួបរួមគ្នាឱ្យក្លាយជាសង្គមមួយដែលយើងអាចកសាងទីអារាមមួយឱ្យធំដែលអាចធ្វើជាប្រយោជន៍ច្រើនដល់ព្រះពុទ្ធសាសនា ក៏ដូចជាសង្គមទូទៅ អាត្មាសប្បាយរីករាយ ហើយនឹងសហការដោយប្រុងខ្លួន ដើម្បីចូលរួមជានិច្ចក្នុងការរួបរួមពរ...។

**អ៊ុំលឿម :** ក្នុងនាមខ្មែរប៉ុស្តិ៍ កូណាសូមអរព្រះគុណដល់ព្រះគ្រូចៅអធិការ ដែលបានផ្តល់ការអនុញ្ញាតិឱ្យខ្ញុំកូណាសម្ភាសន៍អំពីដំណឹងរឿងដ៏ពិស្តារនៃវត្ត "ព្រះពុទ្ធរង្សី" នេះ កូណាសូមថ្វាយបង្គំលា ៕

## Yoo's Auto Service and Collision



យូ បំរើសេវារថយន្ត
និងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច

FREE ESTIMATES

យើងអាចជួសជុលរថយន្តដ៏មានតម្លៃរបស់លោកអ្នក ឱ្យបានប្រសើរបំផុត ដើម្បីសុវត្ថិភាពលោកអ្នក មិនឱ្យខុសចិត្តឡើយ ។

**ផ្នែកជាងម៉ាស៊ីន**

- Check Engine Light Diagnostic
- Electronic Wheel Alignment
- Certified Enhanced Emission
- Inspection & Repairs
- Muffler & More

**ផ្នែកជួសជុលតួរថយន្ត**

- Expert Body Work
- Fender & Paint Work
- Frame Straightening
- Insurance Specialists




189 W. Duncannon Ave. Phila., PA 19120

ទូរស័ព្ទលេខ SAM 215-457-7777 ឬ
215-457-7779, Fax-215-457-7475




## ឱសថស្ថានខ្មែរ




ឱសថការីខ្មែរ ដើន ចាច់ នៅ Old York Rd និង Rockland St




- ផ្ញើថ្នាំជូនដល់ផ្ទះដោយឥតគិតថ្លៃ
- ទទួលអ៊ិនស្ទួរិនស្ទើរគ្រប់មុខ
- ទទួលបន្តផ្តល់ថ្នាំដែលលោកអ្នកកំពុងប្រើទិញមកពីឱសថស្ថានផ្សេងៗ
- តម្លៃថោកៗបំផុត និងមានស្តុកឱសថគ្រប់មុខប្រភេទ
- ផ្តល់សេវាដោយរហ័សទាន់ចិត្ត
- មានឱសថវីតាមីន-ឱសថចិនសែ និងឧបករណ៍ព្យាបាលមុខជំងឺ

ម៉ោងធ្វើការ :
ច័ន្ទ-សុក្រ : 9am-7pm
សៅរ៍ : 9am-5pm
អាទិត្យ : បិទទ្វារ

1337 W. Rockland St.
Philadelphia, PA 19141
Tel: 267-297-5879
Fax: 267-297-5880

**បំណ្ណរង្វាន់ $30**

សំរាប់ភ្ញៀវដែលមានអាយុពី៦៥ឡើងទៅបើផ្ទេរបញ្ជាទិញថ្នាំពីរ ឬលើស យើងនឹងជូនបំណ្ណរង្វាន់៣០ដុល្លារ សំរាប់អ្នកមាន Insurance បំណ្ណរង្វាន់មួយសំរាប់ភ្ញៀវ១នាក់ មិនអាចផ្ទេរឱ្យអ្នកដទៃ ផ្តល់រង្វាន់នេះ ក្នុងរយៈពេលខ្លី ហើយយើងខ្ញុំមានសិទ្ធិនឹងបញ្ឈប់ដោយមិនចាំបាច់ប្រាប់មុន

Free $30 Gift Card
with two or more new or transferred prescriptions.
Limit one per customer. non-transferable, for Limited time only. Buy Rite has the right to cancel the promotion at any time without notice. Disclaimer: This discount is not insurance. Offer not valid with prescriptions covered by medicaid, Medicare, or any other governmental pay programs or where prohibited by law.




សូមអញ្ជើញមកលំហែអារម្មណ៍
កំដាត់ភាពអាប់អួរ!

## ភេសជ្ជៈដ្ឋាន ហ្វៀ

*Bar's Open*
*Monday-Saturday*
*10a.m.–2a.m.*
*Sunday*
*11a.m.–2a.m.*

**198 W. Godfrey Avenue.**
**(Corner of Godfrey & 2nd St.)**



Philadelphia, PA 19120
**215-621-7563**

## Vihi Insurance-Income Tax Mortgage-Realty

ធានារ៉ាប់រង_គាត់លើប្រាក់ចំណូល_ខ្ចីប្រាក់ទិញផ្ទះ_ទិញលក់ផ្ទះ

**Insurance** ធានារ៉ាប់រង
(Licensed PA, NJ & DE) អាជ្ញាប័ណ្ណ PA, NJ & DE
Home • ផ្ទះ Car • រថយន្ត
Business • មុខរបរ Health • សុខភាព

**Income Tax** គាត់លើប្រាក់ចំណូល
Individual • ផ្ទាល់ខ្លួន Business • ពីមុខរបរ
Pay Roll • ពីប្រាក់ខែ
Forming New Business • បង្កើតមុខជំនួញថ្មី
Home Deed Transfer • ប្តូរឈ្មោះផ្ទះ
Auto Title Transfer • ប្តូរឈ្មោះម្ចាស់រថយន្ត

Mon.-Fri.: 10 am-6pm . Sat: 11 am-3pm

INCOME TAX
Auto Home Business Life

**Vihi Mortgage** Vihi ខ្ចីប្រាក់ទិញផ្ទះ

| | |
|---|---|
| (Licensed by PA Dept. of Banking) | • អាជ្ញាប័ណ្ណពី PA ការិយាល័យធានាគារ |
| Hiep Vo, MBA, President. | • ហ៊ីប វ៉ូ MBA ប្រធាន |
| Finance/Refinance your home | • ផ្តល់ប្រាក់កម្ចីក្នុងការទិញផ្ទះទិញដំបូង ឬកណ្តាលទី |
| Low interest Rate & Down Payment | • ការប្រាក់ថោក និងលុយកក់តិច |
| Fast Preapproval | • ចម្លើយលឿន |

**Vihi Realty Co**
Dr. Hanh Vo, Broker/Owner Cell (267) 664-2689
Buy & Sell Properties & Businesses
Visit: www.drhanh.net for more foreclosure homes

North Phila – 215-276-8441
5225 N. 5th Street
Phila., Pa 19120

South Phila – 215-336-0600
1519 W. Passyunk Ave.
Phila., Pa 19145
www.vihifinancial.com

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី០២ ខែកញ្ញា ឆ្នាំ២០១១

## Nine Companies...

Continued from page 8

In the letter, Mr Eang explains that an investigation uncovered that many of the companies had undertaken substantial projects, despite their claims to the contrary.

"In case the enterprises still confuse to fulfill the obligation under the above measure... please seek to ban these enterprises from taking part in every project," it concludes.

On Aug 12, Mr Chhon endorsed the letter.

Vongsey Vissoth, director general of the Ministry of Finance, and Mr Eang could not be reached for comment yesterday.

The nine companies named in the letter are KBH Construction, UMV Development, Ngin Yanna Construction, Ung Kim Tou Construction, Seak Chhiv Leng Enterpise, Ung Kim Heng Construction, Liv Construction, Kim Mich Construction Group and Taing Cheng Ong Construction.

However, the letter does not reveal what projects the companies are involved in or the amount of money they owe in tax.

Liv Kim Heng, director of Liv Construction, which has been awarded a $1.6 million project to build irrigation systems in Pursat province, said that his company did pay its taxes.

He said his company typically pays the required one percent income tax as well as an additional 10 percent VAT fee when the project involves private companies, but that for his latest project, it wasn´t clear that VAT was owed.

Taing Chen Ong, owner of Taing Cheng Ong Construction, said his company was awarded a Japanese-funded project in Kompong Cham province, but he refused to discuss the specifics of the project or reveal how much he owes in taxes.

He said yesterday that he failed to understand the ministry´s decision to freeze funding and bar his company from bidding on future projects.

Representatives of the seven other companies named in the letter were not available for comment.

Chan Youttha, chief of cabinet at the Ministry of Water Resources and Meteorology, said he had not heard of the Ministry of Finance´s order.

"I am not aware of this problem," Mr Youttha said. "Some projects have already completed."

# សាលដីកាបណ្ដឹងឧទ្ធរណ៍របស់ ឌុច នឹងត្រូវ ប្រកាស"នៅចុងខែនេះ"

ដោយ : JULIA WALLACE

THE CAMBODIA KILY

អង្គជំនុំជម្រះតុលាការកំពូលសាលាក្ដីខ្មែរក្រហម បាននិយាយកាលពីម្សិលមិញថា សាលដីកាបណ្ដឹងឧទ្ធរណ៍ដែលគេរង់ចាំជាយូរមកហើយ ក្នុងរឿងក្ដី កាំង ហ្គេកអ៊ាវ ហៅឌុច ជាប្រធានពន្ធនាគារក្នុងរបបខ្មែរក្រហម និងត្រូវចេញចុងឆ្នាំនេះ ។ សវនាការបណ្ដឹងឧទ្ធរណ៍ក្នុងរឿងក្ដីនេះ ត្រូវបានបើកកាលពីខែមីនា ហើយក្រុមចៅក្រមរំពឹងថា និងចេញសាលដីកានៅខែមិថុនា ។ កាលពីសប្ដាហ៍មុនក្រុមជនរងគ្រោះក្នុងរបបខ្មែរក្រហមបានសរសេរលិខិតទៅចៅក្រមតុលាការកំពូល ស្នើឱ្យពួកគេជូនដំណឹងដល់សាធារណជននៅពេលដែលពួកគេចេញសាលដីកា។ សមាគមជនរងគ្រោះក្សេមក្សាន្តបានសរសេរថា "មួយរយៈកាលកន្លងមកកាលបរិច្ឆេទត្រូវបានកំណត់សម្រាប់ការចេញសាលដីកា ប៉ុន្តែកាលបរិច្ឆេទនេះបានកន្លងផុតដោយគ្មានការពន្យល់ណាមួយឡើយ "។ តុលាការកំពូលបានលើកឡើងនៅក្នុងសេចក្ដីជូនដំណឹងថា ស្របពេលកំពុងដំណើរការសាលដីការរបស់ ឌុច តុលាការក៏មានការជាប់រវល់ពិចារណាបណ្ដឹងឧទ្ធរណ៍ស្ដីអំពីបញ្ហាផ្លូវច្បាប់ក្នុងសំណុំរឿងទីពីររបស់តុលាការ ដែលឥឡូវនេះស្ថិតក្នុងដំណាក់កាលកាត់ក្ដី ។ សេចក្ដីប្រកាសនេះ មានខ្លឹមសារថា "ចៅក្រមពន្យារចេញសេចក្ដីសម្រេចលើបណ្ដឹងឧទ្ធរណ៍ក្នុងសំណុំរឿង០០១នៅចុងឆ្នាំនេះ" ៕

## Borei Keila Advocate...

Continued from page 8

detained Mr Soeun but admitted Phanimex had "ordered" him to sign the apology.

"We only brought him to the office to educate him and stop him defaming the company," Ms Sophan said.

Yin San, Prampi Makara district police chief, denied knowledge of Mr Soeun´s alleged detention.

About 384 Borei Keila families have been involved in a year-long land dispute after Phanimex promised in 2003 to provide them with accommodation in exchange for their land. So far, 1,382 families have been found eligible for resetlement, but the remaining 384 families remain in temporary accommodation.

Mr Soeun claimed in a speech at Wednesday´s prayer ceremony that the company did not have enough money to build the required amount of housing and that some apartments were sitting empty.

តមកពីទំព័រទី ៨

## ហាមឃាត់ក្រុមហ៊ុនចំនួន៩...

"ដើម្បីឱ្យក្រុមហ៊ុនទាំងនេះសហការបានល្អប្រសើរជាងមុនក្នុងការធ្វើសវនកម្ម និងត្រឡប់ទៅបំពេញបង់ពន្ធសារពើភណ្ឌឱ្យបានត្រឹមត្រូវវិញនោះអគ្គនាយកដ្ឋានពន្ធដារសូមស្នើឱ្យឯកឧត្ដមឧបនាយករដ្ឋមន្ត្រីក្រសួងសេដ្ឋកិច្ច និងក្រសួងហិរញ្ញវត្ថុមេត្តាផ្អាកបង់ប្រាក់សម្រាប់ការអនុវត្តន៍គម្រោងទាំងនោះសិន។

នៅក្នុងលិខិតដដែលនេះលោក ស៊ីម អ៊ាង បានពន្យល់ថា តាមការស៊ើបអង្កេតបានរកឃើញថា ក្រុមហ៊ុនភាគច្រើននៅក្នុងចំណោមក្រុមហ៊ុនទាំងនោះ បានទទួលយកគម្រោងធំៗ បើទោះបីជាពួកគេធ្វើការអះអាងផ្ទុយពីនេះក៏ដោយ ។

លិខិតនេះសន្និដ្ឋានថា "នៅក្នុងករណីដែលក្រុមហ៊ុនទាំងនេះនៅតែបដិសេធមិនបំពេញកាតព្វកិច្ចដូចវិធានការខាងលើទៀតនោះ...សូមធ្វើយ៉ាងណាហាមឃាតក្រុមហ៊ុនទាំងនេះកុំឱ្យពាក់ព័ន្ធនៅក្នុងគម្រោងទាំងឡាយទៀត "។ កាលពីថ្ងៃទី១២ខែសីហា លោក គាត ឈន់ បានចារយល់ព្រមតាមសំណើក្នុងលិខិតនោះ។

ទាំងលោក វង្សី វិស្សុត ជាអគ្គនាយកក្រសួងហិរញ្ញវត្ថុ និងលោក ស៊ីម អ៊ាង មិនអាចទាក់ទង ដើម្បីសុំការអធិប្បាយបានទេកាលពីថ្ងៃព្រហស្បតិ៍។

KBH Construction,UMV Develop ment, Ngin Yanna Construction,Ung Kom Tou Construction, Seak Chhiv Leng Enterprise Ung Kom Heng Construction,Liv construction,Kom Mich Cons truction Group និងក្រុមហ៊ុន Taing Cheng Ong Construction ។

ទោះជាយ៉ាងណាលិខិតនេះមិនបានបញ្ជាក់ថា តើក្រុមហ៊ុនទាំងនេះពាក់ព័ន្ធនៅក្នុងគម្រោងណាខ្លះឬថា តើប្រាក់ពន្ធប៉ុន្មានដែលក្រុមហ៊ុនទាំងនេះជំពាក់នោះទេ។

លោក លីវ គីមហេង ជាប្រធានក្រុមហ៊ុន Liv Construction ដែលទទួលបានគម្រោងមួយដែលមានទឹកប្រាក់១.៦លានដុល្លារ ដើម្បីសាងសង់ប្រព័ន្ធធារាសាស្ត្រនៅខេត្តពោធិ៍សាត់នោះ បានមានប្រសាសន៍ថា ក្រុមហ៊ុនរបស់លោកពិតជាបានបង់ពន្ធអស់ហើយ ។

លោកបានមានប្រសាសន៍ថា ក្រុមហ៊ុនរបស់លោកជាធម្មតាតែងបង់ពន្ធមួយភាគរយលើប្រាក់ចំណូលព្រមទាំងពន្ធបន្ថែម VAT១០ភាគរយ ដូចដែលច្បាប់តម្រូវនៅពេលដែលគម្រោងនេះពាក់ព័ន្ធនឹងក្រុមហ៊ុនឯកជន ប៉ុន្តែសម្រាប់គម្រោងថ្មីបំផុតរបស់លោកនោះវាមិនច្បាប់ថា តើមានការការពាក់ព័ន្ធ VAT ដែរឬអត់ទេ។

លោក តាំង ចេងអុង ជាម្ចាស់ក្រុមហ៊ុន Taing Cheng Ong Construction បានមានប្រសាសន៍ថា ក្រុមហ៊ុនរបស់លោកបានទទួលគម្រោងមួយនៅក្នុងខេត្តកំពង់ចាមដែលផ្ដល់មូលនិធិដោយប្រទេសជប៉ុន ប៉ុន្តែលោកបានបដិសេធមិននិយាយលម្អិតពីគម្រោងនេះ ឬថា តើលោកជំពាក់ពន្ធប៉ុន្មានឡើយ ។

កាលពីម្សិលមិញលោកបានមានប្រសាសន៍ថា លោកមិនយល់ពីសេចក្ដីសម្រេចរបស់ក្រសួងក្នុងការបង្កកការផ្ដល់មូលនិធិនិងការហាមឃាត់ក្រុមហ៊ុនរបស់លោក-មិនឱ្យចូលរួមក្នុងការដេញថ្លៃនាពេលខាងមុខទេ ។

តំណាងក្រុមហ៊ុនទាំង៧ផ្សេងទៀតដែលមានឈ្មោះនៅក្នុងលិខិតនេះមិនអាចទាក់ទងសុំការអត្ថាធិប្បាយបានទេ។

លោក ចាន់ យុត្ថា ជាប្រធានខុទ្ទកាល័យក្រសួងធនធានទឹក និងឧតុនិយមបានមានប្រសាសន៍ថា លោកមិនបានដឹងអំពីបញ្ហានេះរបស់ក្រសួងហិរញ្ញវត្ថុទេ ។

លោកបានមានប្រសាសន៍ថា"ខ្ញុំមិនបានដឹងពីបញ្ហានេះទេ ។ គម្រោងមួយចំនួនបានបញ្ចប់រួចរាល់អស់ហើយ ៕

តមកពីទំព័រទី ៨

## អ្នកគាំទ្រសមាគមន៍បូរីកីឡាចោទ...

អំឡុងពេលឃុំខ្លួននេះ លោកស្រី ស៊ុយ សុផាន ជានាយិកាក្រុមហ៊ុនផានអ៊ីម៉ិចតាមចោទថា បានគំរាមកំហែងលោក សឿន អំពីការជាប់ពន្ធនាគារ ប្រសិនបើគាត់មិនសុំទោសក្រុមហ៊ុន ហើយផ្ដិតមេដៃលើឯកសារមួយដែលទទួលស្គាល់ថា សំដីរបស់លោកដែលបានថ្លែងនៅឯពិធីបួងសួងរបស់សហគមន៍កាលពីថ្ងៃពុធជាសំដីមិនពិត។

លោក សឿន បាននិយាយថា "ខ្ញុំត្រូវសុំទោសក្រុមហ៊ុននេះ ហើយសន្យាឈប់ជំរុញក្រុមអ្នកភូមិឱ្យធ្វើអំពើអនាធិបតេយ្យទៀត ។ ពួកគេបានបង្ខំឱ្យខ្ញុំផ្ដិតមេដៃលើឯកសារនោះ ដោយនិយាយថា ប្រសិនបើខ្ញុំមិនធ្វើតាមទេនោះ ខ្ញុំនឹងត្រូវបញ្ជូនទៅកាន់ពន្ធនាគារព្រៃស"។

លោកស្រី សុផាន បានបដិសេធថា ក្រុមហ៊ុនរបស់លោកស្រីមិនបានឃុំខ្លួនលោក សឿន ទេ ប៉ុន្តែបានទទួលស្គាល់ថា ក្រុមហ៊ុនផានអ៊ីម៉ិចបាន "បង្គាប់"ឱ្យរូបលោកចុះហត្ថលេខាលើលិខិតសុំទោសនេះមែន ។

លោកស្រី សុផាន បានមានប្រសាសន៍ថា " យើងគ្រាន់តែបាននាំគាត់ទៅការិយាល័យ ដើម្បីធ្វើការណែនាំដល់រូបគាត់ ហើយហាមគាត់ឱ្យឈប់បរិហារកេរ្តិ៍ក្រុមហ៊ុនប៉ុណ្ណោះ"។

លោក ចាន់ សុវេត ប្រធានឃ្លាំមើលរបស់អង្គការសិទ្ធិមនុស្សអាដហុកបានមានប្រសាសន៍ថា គ្មានក្រុមហ៊ុនណាមានសិទ្ធិឃុំខ្លួនឬក៏ចោទសួរក្រុមអ្នកភូមិនោះទេ ហើយបានមានប្រសាសន៍ថា អង្គការអាដហុកនឹងធ្វើការស៊ើបអង្កេតលើហេតុការណ៍នេះ ។

លោកបានមានប្រសាសន៍ថា "វាជារឿងខុសច្បាប់ទាំងស្រុងមានតែនគរបាលទេដែលអាចធ្វើដូច្នេះបាន"។

លោក យិន សាន អធិការនគរបាលខណ្ឌ៧មករា បានបដិសេធថា លោកមិនបានដឹងអំពីការឃុំខ្លួនលោក សឿន នោះទេ ។

ប្រជាពលរដ្ឋនៅបុរីកីឡាប្រមាណ៣៨៤គ្រួសារ បានជាប់ពាក់ព័ន្ធទៅនឹងជម្លោះដីធ្លីជាយូរឆ្នាំមកហើយ បន្ទាប់ពីក្រុមហ៊ុនផានអ៊ីម៉ិចបានសន្យាក្នុងឆ្នាំ២០០៣ ថា នឹងផ្ដល់ឱ្យពួកគេនូវផ្ទះជាថ្នូរនឹងដីរបស់ពួកគេ ។ រហូតមកទល់ពេលនេះប្រជាពលរដ្ឋចំនួន១.៣៨២ គ្រួសារទទួលសិទ្ធិសម្រាប់ការតាំងទីលំនៅថ្មីហើយ ប៉ុន្តែប្រជាពលរដ្ឋដែលនៅសេសសល់ទាំង៣៨៤គ្រួសារទៀតកំពុងរស់នៅក្នុងកន្លែងស្នាក់នៅជាបណ្ដោះអាសន្ននៅឡើយ ។

លោក សឿន បានអះអាងនៅក្នុងពិធីបួងសួងកាលពីថ្ងៃពុធថា ក្រុមហ៊ុននេះពុំមានលុយគ្រប់គ្រាន់ដើម្បីសាងសង់លំនៅដ្ឋានឱ្យគ្រប់ចំនួនតាមតម្រូវការទេ ហើយថា អគារលំនៅដ្ឋានខ្លះកំពុងស្ថិតក្នុងភាពទទេស្អាតនៅឡើយ ៕

តមកទំព័រទី ១

## ឃាតកម្មលើ...

នាវេលារសៀលម៉ោង៥នៃថ្ងៃកើតហេតុពេលត្រឡប់មកផ្ទះវិញ ក៏គោះទ្វារបន្ទប់ដេក កូនស្រីមិនព្រឆ្លើយ ក៏ចាក់សោរចូលទៅមើលតែអកុសល ឃើញមនុស្សបីនាក់ដេកដួលក្នុងថ្លុកឈាមទៅហើយ ទើបឆោឡោឡើង ហៅរកប៉ូលិសនាពេលនោះ ។ លោក ម៉ៅ ម៉ន បានឱ្យដឹងថា "ចៅទាំងពីររបស់គាត់ ទើបនឹងធានាយកពីកម្ពុជាមកបាននាវេលាម៉ោង៩រសៀល ចៅស្រីដែលកំពុងរៀនជាមួយគាត់បានសុំទៅបន្ទប់ ដើម្បីសម្រាកថ្ងៃត្រង់នៅពេលចៅប្រុសកំពុងលេង "ហ្គេម អេឡិចត្រូនិក" ប្រមាណម៉ោង២ម្ដាយក៏ហៅឱ្យទៅសម្រាកដែរ" ។ លោក ម៉ៅ ម៉ន បន្តថា "បាត់ចៅស្រីយូរក៏ទៅគោះទ្វារសួរនាំនៅម៉ោង២ និង៣០នាទីតែ នាង ចាន់ ធី ឆ្លើយថា ទុកឱ្យកូនសម្រាកឱ្យបានច្រើនព្រោះត្រូវចូលរៀនស្អែក ហើយបន្តមកទៀតមានទូរ-ស័ព្ទរបស់ប្ដីនាងហៅមកក៏យកទៅឱ្យវេលាម៉ោង៣ នាងបង្ហើបទ្វារបន្តិចយកទូរស័ព្ទ ដោយមិននិយាយអ្វីទេ " ប្រមាណជាម៉ោង៥រសៀល ទើបសោកនាដកម្មបានត្រូវបង្ហាញពេលអ្នកស្រី ខេម ជាម្ដាយនឹងជាជី ជូនក្មេងត្រឡប់ចូលផ្ទះវិញ ។

នាង ចាន់ធី បានទៅព្យាបាលជម្ងឺផ្លូវចិត្តចុងក្រោយបង្អស់នៅពីបីថ្ងៃមុននោះពេទ្យថា "ទឹកមុខនាងមិនល្អសោះ" ។ ក្រុមប៉ូលិសស៊ើបអង្កេត បានរកឃើញសំបុត្រសរសេរដោយដៃ ចាន់ ធី ដែលមុននឹងសម្រេចចិត្តបញ្ចប់ជីវិតរបស់ខ្លួននិយាយថា "សុំទោសដល់ឪពុកម្ដាយដោយសុំយកកូនទៅជាមួយខ្លួនហើយ" តែនាង ចាន់ ធី ពុំបានលាលោកទៅជាមួយកូនទាំងពីរទេ ដោយក្រុមសង្គ្រោះបានជួយជីវិត នាងបានហើយប្រមាណជាម៉ោងបីទៀបភ្លឺ នៃថ្ងៃបន្ទាប់នាងនិយាយរឿងរាយការណ៍ប្រាប់ប៉ូលិស ហើយក៏មានការចោទប្រកាន់ពីបទឧក្រិដ្ឋក្នុងការធ្វើឃាតលើរូបកូនទាំងពីរភ្លាមដែរ ។

ទូរទស្សន៍បានធ្វើការផ្សព្វផ្សាយព្រឹត្តិការឧក្រិដ្ឋនេះច្រើនដងយ៉ាងទូលំទូលាយ ។ សហគមន៍ទាំងមូលភ្ញាក់ផ្អើលយ៉ាងខ្លាំង ហើយព្រួយបារម្ភពីបញ្ហាផ្លូវចិត្តដែលអាចបណ្ដាលឱ្យមានគ្រោះថ្នាក់ដល់ជីវិតកាន់តែខ្លាំងឡើង ។ សហគមន៍ខ្មែរ មានសមាគមខ្មែរ វត្តព្រះពុទ្ធរង្សី វត្តព្រះពុទ្ធប្រទានពរ សមាគម MHA បានចូលរួមគាំទ្រគ្រួសារលោក ម៉ៅ ម៉ន យ៉ាង កក់ក្ដៅ... ហើយនៅថ្ងៃទី១ខែកញ្ញាបានរួមប្រជុំនៅវត្តព្រះពុទ្ធរង្សី សម្ដែងឆន្ទៈរួមចាប់អារម្មណ៍ឱ្យបានខ្លាំងចំពោះវិបត្តិផ្លូវចិត្តដែលបំផ្លាញគ្រួសារខ្មែរជាប្រចាំដោយម្នាក់ៗខិតខំដោយលើកលេសខ្មាសអៀន មកលាក់បំបាំង ។ នៅថ្ងៃទី១ខែកញ្ញា "ក្រុមប្រឹក្សាគាំទ្រគ្រួសារខ្មែរ" មួយបានកើតឡើង ដើម្បីស្ថិតនៅជាជំនួយស្មារតីដ៏សំខាន់មួយដល់គ្រួសារខ្មែរទាំងអស់នៅហ្វីឡាដែលហ្វៀ សមាគមខ្មែរបានទាមទារឱ្យមានការផ្ដល់ព័ត៌មានអប់រំ ជូនដល់អ្នកមកដល់ ស.រ.អានេះ ជាមួយនឹងវិបត្តិដែលពុំទាន់សះស្បើយនៅឡើយ រីឯវត្តព្រះពុទ្ធរង្សីទទួលភារកិច្ចពិធីបុណ្យទាំងឡាយ ដែលទាក់ទងទៅនឹងសពកុមារទាំងពីរ ដោយទទួលបន្ទុកទាំងអស់ជួយគ្រួសារអ្នករងគ្រោះ ៕

Preah Buddha Rangsey Temple
2400 South 6th Street
Philadelphia, PA 19148

**Sovanna Mao**
July 10, 1999 ~ August 31, 2011

**Sovann Mao**
January 10, 2003 ~ August 31, 2011

**Funeral Service:**
Friday, September 9, 2011
Viewing begins 5:00pm
Religious Ceremony start at 7:00pm

**Religious Ceremony:**
Saturday, September 10, 2011
9:00am - 12:30pm (program)
1:00pm moving bodies to Crematory
Philadelphia Crematories, Inc.
7350 State Road | Philadelphia, PA 19136

**Donations Appreciated**
For more information about the ceremony & donations contact:
Sotheary Mao | 1721 S. 18th Street | Philadelphia, PA 19145
Memo: Sovanna Mao & Sovann Mao
267-528-5446 (English) | 267-709-0585 (English) | 267-304-3673 (Khmer)

តមកពីទំព័រទី ៣

## អ្នកអានឆ្លើយតបលិខិត លឹម គឹមយ៉ា...

ដែលសរសេរថា "***ទស្សនៈអ្នកឯករាជ្យ គួរឱ្យ ឆ្ងល់ពី សម រង្ស៊ី*** នោះមកជា ***ទស្សនៈអ្នកលេងវែក ឬទស្សនៈអ្នកលេងអុក គួរឱ្យឆ្ងល់ពីខ្មែររត់ចោលស្រុក***" ទៅវិញនោះ គឺទាំងខ្លួនលោកផ្ទាល់ក្តី ទាំងខ្ញុំក្តី ទាំងខ្មែររស់នៅក្រៅស្រុកក្តី និងខ្មែរនៅក្នុងស្រុកក្តី គឺគ្មាននរណារកចម្លើយចំពោះសំនួរថា តើហេតុអ្វីបានជា សម រង្ស៊ី រត់ចោលស្រុក ឬហេតុអ្វីបានជាខ្មែររត់ចោលស្រុកនោះឃើញនៅឡើយ ។

មានម្តងម្កាល ខ្ញុំឮប្អូនបង្កើតរបស់លោក គិម យ៉ា និងប្អូនបង្កើតរួមឈាមរបស់ខ្ញុំដែរ ដែលនៅក្នុងស្រុក ពោលដៀមដាមដល់បងៗនៅក្រៅស្រុកថា ...ជាខ្មែររត់ចោលស្រុក គេមិនឱ្យតម្លៃទេ ។ល។ តើមិននឹងប្អូនៗអស់នោះនឹករកពាក្យមកបង្អាប់បងៗខ្មែរនៅក្រៅស្រុកថា ជាអ្នករត់ចោលស្រុកនោះ គឺប្អូនៗមានសួរខ្លួនឯងឬទេថា សូម្បីតែចិន យួន លាវ សៀម ថ្វា ក្តី គឺឱ្យតែពួកគេមករស់នៅក្នុងស្រុកខ្មែរហើយ ទោះបីត្រូវគេលីពូថៅទៅដេញកាប់ទៀត ក៏ពួកគេនោះមិនចង់រត់ចោលស្រុកខ្មែរដែរ ចុះចង្រៃវាយក៏អីបានជាខ្មែររត់ចោលស្រុកខ្លួនឯងទៅវិញ ! តើនេះគួរឱ្យឆ្ងល់ ឬទេ? ឬខ្មែរអស់នោះជិនណាយនឹងសម្បត្តិវប្បធម៌ដ៏ឥតកាត់ថ្លៃបានដូចជា ប្រាសាទអង្គរវត្ត ដែលជាមរតកម៉ែឪចែកឱ្យ ហើយចង់មកមើលសប្បាយនឹងទូអេហ្វែល ឬវិហារស្ស ដែលជាទ្រព្យរបស់អ្នកក្រៅនោះ ? ឬក៏មកពីមាននរណាបង្កើតឱ្យមានរឿងឧត្បាតកើតឡើងនៅក្នុងស្រុក ដែលជម្រុញខ្មែរអស់នោះឱ្យរត់ចោលស្រុកទាំងឈឺចិត្តក្តួឈាមមិនចេញ ហើយដួលមិនបាច់គេច្រានយ៉ាងនេះ ? ឬក៏? ឬក៏? ឬក៏?...។

មាតុភូមិកម្ពុជា ដែលជាទីស្រឡាញ់របស់យើង ត្រូវគេធ្វើបាបជ្រក់ជ្រិញឱ្យបាត់បង់វិនាសបន្តិចម្តងៗជារាប់រយឆ្នាំមកហើយ ឯបងប្អូនបង្កើតរួមឈាមខ្មែរយើង ក៏រងទុក្ខវេទនារកតែបាយមកចម្អែតក្រពះក៏មិនបានដែរ ។ ហេតុយ៉ាងណា បានជាអ្នកភូមិផងយើងគេរីតតែរីកចម្រើន តែយើងបែរជាហិនហោចទៅៗ?... តើនេះមកពីអ្វី?... ចាប់ពីឆ្នាំ ២០១១នេះតទៅ គឺជាពេលដែលយើងជាខ្មែរប្រុសស្រី ចាស់ក្មេង ទាំងខ្មែរស ខ្មែរខ្មៅ ទាំងខ្មែរល្វង់ ខ្មែរប្រាជ្ញ គឺខ្មែរទាំងអស់ត្រូវប្តូរក្បួនយុទ្ធសាស្ត្រចេញពី "ភាពខាំគ្នាដូចឆ្កែ មកជាស្រលាញ់គ្នាដូចខ្មែរ" វិញហើយ ។ តើ **ស្រលាញ់គ្នាដូចខ្មែរ** នេះមានន័យយ៉ាងណា និងមានភាពដូចម្តេចដែរ? អ្នកណាក៏អាចឆ្លើយនឹងសំនួរដ៏ខ្លីនេះបានដែរ ប៉ុន្តែត្រូវចាំឱ្យច្បាស់ថា **គឺមានតែពូជអង្គរទេ ទើបអាចផ្តល់ចម្លើយដ៏ត្រឹមត្រូវបាន ។**

***សូមអរគុណ! -ដោយ : ផ្ការាំងភ្នំ***

នាទី ប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : គីម វិមល**

**(តពីលេខមុន)**

បរិបទសន្តិសុខនៅកម្ពុជា។

**៥ឧសភា :** របាយការណ៍ នៃយូអែដ (USAID) ប្រកាសបញ្ជាក់ថា មានកង្វះខាតដ៏ខ្លាំងក្លាមួយផ្នែកស្បៀងអាហារ នៅកម្ពុជា។

**១៤-១៧ឧសភា :** ទំនាក់ទំនង អ.ស.ប ដឹកនាំដោយលោកឧត្តមសេនីយ៍ជាន់ខ្ពស់ទី ឌីប៉ុយអាម៉ា ដែលជាទីប្រឹក្សាយោធាអមអគ្គលេខាធិការ អ.ស.ប ចុះពិនិត្យការគ្រប់គ្រងការឈប់បាញ់គ្នា ។ សេចក្ដីសង្កេតបានត្រូវទទួលយកបាន។

**១៥ឧសភា :** ប្រទេសឥណ្ឌូនេស៊ីយាងអញ្ជើញស្ដេច សីហនុ ក្នុងឱកាសការប្រជុំ ក្នុងក្របខ័ណ្ឌ ឧ.ប.ស ឧត្តមប្រឹក្សាសន្តិសុខ) នៅខែមិថុនា។

**១៨ឧសភា :** ភាគីខ្មែរក្រហមគំរាមបើកយុទ្ធនាការឡើងវិញ នៅថ្ងៃ៥មិថុនា។ បើប្រសិនណា ភាគីរដ្ឋកម្ពុជានៅតែពុំព្រមទទួលស្គាល់គម្រោងសន្តិភាពរបស់ក្រុម P- ៥ ទេ។

**២០ឧសភា :** រដ្ឋកម្ពុជា ធ្វើពិធីរំលឹកការចងកំហឹង ដ៏អធិកអធមមួយ។ ជា ស៊ីម សន្យាចំពោះប្រជាពលរដ្ឋថា "របបប្រល័យពូជសាសន៍ពុំវិលត្រឡប់មកវិញឡើយ"។

**២៨-៣១ឧសភា :** អ្នកស្រី មីត តេរ៉ង់ ភរិយាលោកប្រធានាធិបតេយ្យបារាំងធ្វើទស្សនកិច្ចនៅភ្នំពេញ។ មានការជួបជាមួយលោក ហ៊ុន សែន និងលោក ហោ ណាំហុង។

**៣១ឧសភា :** វរៈជនខ្មែរក្រហមម្នាក់រត់ចោលជួរភាគីខ្មែរក្រហម។ ចាញ់ សាមុត ប្រាប់ឱ្យដឹងថា មានចារកិច្ច ខ្មែរក្រហមនៅក្នុងភាគីសេរីមិនមែនកុម្មុយនីស្តទាំងពីរនៃរដ្ឋាភិបាលជាតិកម្ពុជា (GNC)។

**១មិថុនា :** ជុំនួប ហ៊ុន សែន និងស្ដេច សីហនុ នៅក្រុងហ្សាកាកតា : សេចក្ដីព្រមព្រៀងមួយកើតឡើងក្នុងបរិបទ ឧ.ប.ស ក្នុងក្របខ័ណ្ឌ បទការឈប់បាញ់គ្នា និងស្ដីពីការបញ្ឈប់ជំនួយបរទេសនៅភាគីជម្លោះទាំងបួន។

**២-៣មិថុនា :** ការបើកការប្រជុំ ឧ.ប.ស (CNS) បើកប្រជុំដោយមានតំណាងប្រទេសបារាំង និងឥណ្ឌូនេស៊ីជាប្រធានចម្រុះអង្គប្រជុំ។ លោក សឺន សាន ដាក់ខ្លួនទទួលសេចក្ដីព្រមព្រៀងនេះតាំងពីម្សិលមិញម៉្លេះ។ ភាគីខ្មែរក្រហមទាត់ចោលទាំងស្រុង។ ស្ដេច សីហនុ កំណត់ថា លើកទី១ហើយ ដែលភាគីខ្មែរពុំមែនកុម្មុយនីស្តសុខចិត្តទទួលស្គាល់ជាឯកច្ឆន្ទ។ ហ៊ុ សែន ប្រកាសការបន្ថែមគោលការណ៍ផ្សេងដែលស្ថិតនៅក្នុងការពុំមានដំណោះស្រាយពីមុនត្រង់លំដាប់ "សំណួរនៅសេសសល់"។ ការប្រជុំ ឧ.ប.ស (CNS) នេះធ្លាក់ទឹកពុំមានអ្វីប្លែកទេ។

**៤មិថុនា :** ការឈប់បាញ់គ្នារងនូវការរំលោភដ៏ខ្លាំងក្លាមួយនៅតំបន់ប៉ៃលិន។

**៦មិថុនា :** ស្ដេច សីហនុ ឱ្យដឹងថា ទ្រង់ចាំទទួលចំលើយនៃការយាងមួយពី ហ៊ុន សែន ។

**(នៅមានតលេខក្រោយ)**



នាទី ព្រះពុទ្ធសាសនា

# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

**១៤២**-ក្នុងកំឡុងពេលគង់នៅជាបណ្ដោះអាសន្នរបស់ព្រះពុទ្ធនៅឯជាយក្រុងរាជគ្រឹះនោះ, មានគ្រូម្នាក់ឈ្មោះ **សញ្ជ័យ** ជាគ្រូប្រចាំសាលាមួយក្នុងចំណោមសាលាលទ្ធិដទៃទៀត មានកេរ្តិ៍ឈ្មោះល្បីល្បាញណាស់ រស់នៅក្នុងនិគមនោះ។ គាត់មានសិស្សគណប្រហែលជាពីររយនាក់ ហើយក្នុងចំណោមសិស្សទាំងអស់មាន **ឧបតិស្សៈ** និង **កោលិតៈ** ជាសិស្សមានប្រាជ្ញាវាងវៃបំផុត។ ទោះជាយ៉ាងនេះក្ដី, សិស្សទាំងពីរនាក់នៅតែមិនទាន់អស់ចិត្តនឹងអ្វីដែលគ្រូរបស់ខ្លួនបានបង្រៀនគេមានបំណងចង់រៀនសូត្រយកចំណេះវិជ្ជាមានកំរិតជ្រាលជ្រៅ និងខ្ពង់ខ្ពស់ជាងនេះថែមទៀតដែលនឹងនាំទៅរកការឈប់កើត និងឈប់ស្លាប់ទៀត។ ពួកគេជាកល្យាណមិត្តនឹងគ្នា ហើយការសិក្សា និងការចេះដឹងរបស់ពួកគេមានកំរិតស្មើគ្នា។ ដូច្នេះអ្នកទាំងពីរបានសន្យានឹងគ្នាថា ម្នាក់ៗត្រូវខិតខំអស់ពីសមត្ថភាពតាមបញ្ញាផងខ្លួននឹងត្រូវខំហ្វឹកហ្វឺនស្រាវជ្រាវរកនូវមោក្ខធម៌ ហើយថា បើនរណាបានជួបមុនអ្នកនោះត្រូវប្រាប់ដល់អ្នកម្នាក់ទៀតភ្លាម។

**១៤៣**-នៅវេលាព្រឹកមួយពេលដែលឧបតិស្សៈកំពុងដើរតាមដងផ្លូវឆ្ពោះទៅកាន់ក្រុងរាជគ្រឹះគាត់បានឃើញព្រះសមណៈមួយអង្គកំពុងនិមន្តបិណ្ឌបាត។ សមណៈអង្គនេះមានឥន្ទ្រីយ៍ប្លែកស្រគត់ស្រគំថ្លៃថ្នូរ និងពោរពេញទៅដោយសុខសន្តិភាពពន់ពេកណាស់, សូម្បីពេលលោកកំពុងនិមន្តបិណ្ឌបាតក៏អាការៈលក្ខណៈនោះធ្វើឱ្យឧបតិស្សៈចាប់អារម្មណ៍យ៉ាងខ្លាំង ។ គាត់ដើរកាន់តែជិតដល់ភិក្ខុអង្គនោះ គាត់ចាប់អារម្មណ៍ និងនឹកស្ងើចសរសើរក្នុងចិត្តកាន់តែខ្លាំងឡើងៗ ព្រោះគាត់បានឃើញទឹកមុខរបស់លោកហូរស្រោចស្រប់ទៅដោយសេចក្ដីសុខ និងសន្តិភាពមិនអាចនឹងពណ៌នាបាន ។ តាមមើលទៅសមណៈអង្គនេះពិតជាបានកាត់ផ្ដាច់ខ្លួនលោកចេញផុតពីសេចក្ដីភ័យខ្លាចទាំងអស់ហើយ (មោក្ខធម៌) ។ ឧបតិស្សៈគិតថា: "សមណៈអង្គនេះលោកច្បាស់ជាបានរកឃើញនូវបរមត្ថសច្ចធម៌ ដែលយើងកំពុងតែតាមរកហ្នឹងហើយមើលទៅ ឬយ៉ាងហោចណាស់ ក៏លោកជាសាវ័កនៃសាស្ដាចារ្យណាម្នាក់ដែលរកបានឃើញនូវបរមត្ថសច្ចៈមិនខាន ។ ខ្ញុំចង់ដឹងណាស់ថា តើអ្នកណាជាគ្រូរបស់លោក ហើយគ្រូរបស់លោកបង្រៀនធម៌អ្វី ។ អាត្មាអញត្រូវតែដើរតាមលោកសិនអាត្មាអញត្រូវស្វែងរកសច្ចធម៌ឱ្យត្រាតែបាន!"។

**១៤៤**-តែឧបតិស្សៈគិតថា មិនគួរសួរលោកពេលកំពុងបិណ្ឌបាតទេ ដូច្នេះគាត់ចេះតែដើរតាមក្រោយលោករហូតទាល់តែដល់ពេលលោកឈប់បិណ្ឌបាត ហើយនិមន្តចេញពីក្រុងរាជគ្រឹះវិញ។ ពេលនោះគាត់ដើរសំដៅទៅរកព្រះភិក្ខុ, ធ្វើការសំណេះសំណាលសាកសួរដោយសេចក្ដីគោរព ហាក់បីដូចជាគាត់កំពុងនិយាយទៅកាន់មនុស្សដែលធ្លាប់ស្គាល់គ្នាពីមុនមក, រួចហើយគាត់សួរថា "បពិត្រលោកម្ចាស់ដ៏ចំរើន! ឥន្ទ្រិយ៍របស់ព្រះអង្គពោរពេញទៅដោយសន្តិភាពណាស់ មើលទៅលោកម្ចាស់ស្ងប់ស្ងាត់ល្អណាស់ ដែលធ្វើឱ្យខ្ញុំចង់ដឹងចង់ស្គាល់ថា តើគ្រូរបស់លោកម្ចាស់ជាអ្នកណា ។ បានស្ដាប់ធម៌របស់បុគ្គលណាបានជាលោកម្ចាស់ចាកចេញពីផ្ទះមករស់នៅក្នុងជីវិតដ៏បរិសុទ្ធបែបនេះ? តើលោកគ្រូរបស់លោកម្ចាស់ឈ្មោះអ្វីហើយគាត់បង្រៀនអ្វីដល់លោកម្ចាស់? "។

**១៤៥**-ព្រះភិក្ខុអង្គនោះមានថេរដីការតបដោយញញឹមថា "ម្នាលឧបាសកដ៏ចំរើន! ចាំអាត្មាជំរាបឱ្យបានដឹង គឺមានមហាសមណៈដ៏អស្ចារ្យមួយព្រះអង្គមកពីសក្យត្រកូលដែលលះបង់រាជបល្ល័ង្គហើយចាកចេញពីរាជវាំងមកប្រព្រឹត្តប្រតិបត្តិធម៌ក្នុងជីវិតរស់នៅដ៏បរិសុទ្ធ ។ ចំណែកអាត្មានេះក៏បានចាកចេញពីផ្ទះមកប្រតិបត្តិធម៌ជាមួយនឹងមហាសមណៈនោះដែរ។ **ព្រះពុទ្ធ**ជាគ្រូរបស់អាត្មា, អាត្មាប្រតិបត្តិតាមការបង្រៀនរបស់ព្រះអង្គ" ។ ឧបតិស្សៈនឹកគិតក្នុងចិត្តថា មើលទៅប្រហែលជាលោកអង្គនេះបានរៀននូវអមតធម៌ (ធម៌ដែលនាំឱ្យលែងមានការកើត និងការស្លាប់) ពីមហាសមណៈអង្គនោះហើយជាធម៌ដែលអាត្មាអញ និងសំលាញ់កោលិតៈកំពុងតែតាមស្វែងរកអស់ពេលជាយូរអង្វែងមក ។ ដូច្នេះមិនបង្អង់យូរគាត់ក៏សួរទៀតថា "លោកម្ចាស់ដ៏ចំរើន! តើព្រះពុទ្ធបង្រៀនធម៌អ្វី? តើគ្រូលោកម្ចាស់បង្រៀនធម៌អ្វីដល់លោកម្ចាស់? ខ្ញុំព្រះករុណាចង់ដឹងអត្ថន័យរបស់ធម៌នេះខ្លាំងណាស់"។



142-During the Buddha's so journ in the vicinity of **Rajagrha,** there was a well-known master of one of the heretical schools, whose name was **Samjayan Vairatiputra,** living in the area. He had about two hundred pupils, and among them Upatisya and Kolita were the most learned. These two pupils, however, were not satisfied with what their master had taught them, and they hoped to learn that higher and more profound knowledge that lead to no birth and no death. They were the best of friends, and their education and knowledge were on the same level. So they made an agreement that each would try his best with his intelligence and training to search for the highest knowledge, and that as soon as one had found it, he would immediately inform the other.



143- One morning, as **Upatisya** was walking along the road toward **Rajagrha,** he saw a **Sramana** holding out his food bowl. The manner of this **Sramana** was so elegent, neat, pe-aceful and serious, even when he was begging for food, that **Upatisya** was very much astonished. The nearer he approached to the **Sramana,** the stronger became his wonder and, at the same time, his admiration, because he saw flowing from his countenance unlimited peace and happiness. Apparently this **Sramana** had cut himself away from all fear. **Upatisya** thought: "This **Sramana** must have found the ultimate truth that we are pursuing, or he must be, at least, a disciple of one who has found the ultimate truth. I am anxious to know who his master is and what his master teaches. I must follow him. I must find the truth.



144-But **Upatisya** felt that it was improper to question him while he was accepting alms, so he followed him at a distance until he had finished his daily accepting alms and had left the city of **Rajagrha.** Then he came forward, reverently gave his regards as if he were talking to an old acquaintance, and then asked him: "Venerable Master! Your manner is so peaceful and your look so serene that I should really like to know who your teacher is. Under whose direction did you leave home and take up the pure life? What is the name of your teacher and what did he teach you?"



145-The **Sramana** answered smilingly: "Venerable Master! Let me tell you that there is a great **Sramana** of the **Sakya** clan, who gave up his throne and left home to practice pure living. I left my home also to practice with this great **Sramana.** The Buddha is my teacher, and I practice in accordance with his teaching." **Upatisya** thought to himself that perhaps he could learn the dharma of no-birth and no death, which he and his friend **Kolita** had been pursuing for a long time, from this great **Sramana.** So he inquired anxiously: "Venerable Master what is this teaching of the Buddha? What has your master taught you? I should like very much to know its meaning."

តមកពីទំព័រទី ១

# បុណ្យអុំទូកនៅហ្វីឡា...

ដោយ : ខ្មែរប៉ុស្តិ៍

បុណ្យអុំទូកខ្មែរកំពុងតែមានប្រជាប្រិយភាពកាន់តែខ្លាំងនៅសហរដ្ឋអាមេរិកនេះ ។ ដោយនៅពេលប្រណាំងម្តង១ប្រជាពលរដ្ឋរាប់ពាន់ទៅរាប់



ម៉ឺននាក់បានទៅចូលរួមដូចជានៅឡូវែល កាលពីថ្ងៃទី២០ សីហា មុននេះ ។ នៅ "ស៊ីអាថុល" ក៏ធ្លាប់បានរៀបចំបុណ្យអុំទូកដែរ រីឯក្រុមខ្មែរក្រោមមានក្រុមអ្នកអុំទូកពូកែ ហើយអុំឈ្នះលើបរទេសស្ទើរ


ទូកខ្មែរក្រោមលេខ៥ អុំឈ្នះនៅ Florida

គ្រប់ពេលប្រកួត។

(រូបថតអុំទូកនៅ Tampa-Florida) July 30-31.

ជាថ្មីម្តងទៀត នាថ្ងៃសៅរ៍ទី១០ នៅហ្វីឡា ពិធីបុណ្យអុំទូកថ្មីមួយទៀត រៀបចំឡើងដោយវត្តព្រះពុទ្ធរង្សី និងទាក់ទាញសាធារណជនឱ្យមកមើលកីឡាមួយលេងនៅលើទឹកដែលដើមកំណើតវប្បធម៌មកពីកម្ពុជា ។ ជាការពិតណាស់ភាពពូកែអុំទូករបស់ខ្មែរមានចំណាស់រាប់ពាន់ឆ្នាំនៅជញ្ជាំងអង្គរវត្ត ក៏មានឆ្លាក់រូបទូកជាឧបករណ៍ធ្វើដំណើរលើទឹកសម្រាប់ធ្វើសង្គ្រាមសម្រាប់នេសាទសម្រាប់ព្រះសង្ឃបិណ្ឌបាត្រ (ទូកចង្ហាន់ហុយ) សម្រាប់ប្រកួតកីឡា... មានប្រើជាបន្តរហូតដល់សព្វថ្ងៃនេះ ។

វប្បធម៌ នៃពិធីបុណ្យអុំទូក ដែលប្រារព្ធនៅជាប់លាប់ជាងគេ គឺធ្វើនៅទីប្រសព្វនៃទន្លេ៤ជួបគ្នា ដែលស្តេចពញាយ៉ាត បាននាំរាជធានីចេញពីអង្គរមកតាំងទីត្រង់ភ្នំដូនពេញនាឆ្នាំ១៤៣១ ។ ដៃមួយ នៃទន្លេទាំងបួននោះ មានលក្ខណៈចម្លែកខុសគេក្នុងលោក គឺដៃទន្លេសាបដែលចរន្តទឹកហូរពីកើតទៅលិចក្នុងរយៈពេល៦ខែ ហើយ៦ខែបន្តមក ក៏ហូរបញ្ច្រាសត្រឡប់មកវិញ គឺពេលនោះហើយដែលពលរដ្ឋដង្ហែរគ្នាមករស់នៅក្បែរទន្លេទាំងបួន ដើម្បីចាប់ត្រី ធ្វើម្ហូបប្រចាំឆ្នាំដូចជា ប្រហុក ផ្អក ត្រីងៀត ត្រីឆ្អើរ ម៉ាំជាដើម ហើយក៏ជាពេលដែលព្រះមហាក្សត្ររៀបចំឱ្យមានពិធីបុណ្យអុំទូកសម្រាប់លើកទឹកចិត្តឱ្យវត្តអារាមគ្រប់ទិសទីផលិតទូកដែលកាន់តែលឿនកីឡាករដែលកាន់តែពូកែចូលមកប្រកួតយកឈ្មោះជាកិត្តិយសរបស់វត្តតែរៀង១ខ្លួនដែរ ។

ឆ្នាំ២០១១ គឺជាលើកដំបូងបង្អស់ដែលវត្តព្រះពុទ្ធរង្សីផ្តើមចេញមុខទៅរៀបចំធ្វើបុណ្យអុំទូកនៅហ្វីឡាដែលហៀសង្ឃឹមថា ឆ្នាំក្រោយ១នឹងមានពេលគ្រប់គ្រាន់សម្រាប់អញ្ជើញវត្តនីមួយ១ឱ្យចូលរួមលេងកីឡាប្រជាប្រិយខ្មែរនេះបាន ៕

# អាថ៌កំបាំង និងសិល្បៈនៃជីវិត

# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

-- ភ្នែកមើលឃើញអាហារ ពណ៌សម្បុរ ផ្សេងៗ ភិនភាគអាហារ -- ស្បែកដៃ ទទួលដឹងការប៉ះពាល់ស្លាបព្រាទទួលដឹងក្តៅត្រជាក់ ទន់ --អណ្តាតទទួលដឹងរសជាតិអាហារ ប្រៃ ជូរ សាប ល្វីង -- សតិអារម្មណ៍ទាំងមូលដឹងថាកំពុងចលនាផ្សេងៗក្នុងការហូបអាហារ ។ល។ John បានធ្វើតាមដោយមិនឱ្យខុសពីការណែនាំឡើយ អស្ចារ្យណាស់ 111 គេពិសោធឃើញថា អាហារមានរសជាតិខ្ពស់ជាងធម្មតា ឆ្ងាញ់ជាងធម្មតា ទោះបីគេពុំដែលហូបចំណីនោះក៏ដោយ ។ ការដឹងបែបនេះ មានន័យថាJohn បានទទួលបញ្ញាថ្មី ការយល់ដឹងថ្មី ការពិសោធន៍ផ្ទាល់ ។ ចំណុចសំខាន់ គឺជាការពិសោធន៍ដែលលេចឡើងនៅពេលគេឈរនៅក្រៅប្រព័ន្ធ ម៉េម៉ូរី មួយភ្លែត វិញ្ញាណទាំង៥របស់មនុស្សបានត្រូវរួចរដោះពីគំនាបនៃលំហូរគំនិតពីម៉េម៉ូរីមក ។ កត្តានេះនាំឱ្យវិញ្ញាណទាំង៥ អាចបំពេញមុខងារគេ១០០ភាគរយ ដែលសំដែងចេញជាភាពឆ្ងាញ់ពិសារមានរសជាតិ ។ ដូចខ្ញុំពិពណ៌នាអំពីការរួមភេទស្រាប់ (បើចង់ឱ្យសំរេចផល ចូរកុំឱ្យរឿងរ៉ាវនានា ជ្រៀតចូលឡុកឡំនឹងការងាររួមភេទ) ។ ថ្ងៃនេះសូមអ្នកយកវិធីនេះទៅសាកល្បងផ្ទាល់មើលទៅចុះនឹងបានឃើញជាក់ស្តែងពុំខានឡើយ ។

ការរៀបរាប់ខាងលើនេះ ខ្ញុំចង់ជំរាបជូនថា ក្នុងមនុស្សយើងម្នាក់ៗនេះ បញ្ញា ឬប្រាជ្ញា កើតចេញពីប្រភពពីរយ៉ាង (មួយ)គឺមកពីបន្ទប់ម៉េម៉ូរី ពោលគឺមកពីប្រភពការចងចាំការរៀនសូត្រពីសង្គមរស់នៅ (ពីរ)គឺនៅពេលដែលម៉េម៉ូរីទ្រោមចុះ ឬបញ្ឈប់សកម្មភាពទាំងស្រុង បញ្ញា មួយទៀតលេចឡើងដែលមានប្រភពមកពីកុងស្សិនសបរិសុទ្ធ Pure consciousness .អ្នកប្រាជ្ញបណ្ឌិតបូរាណឱ្យឈ្មោះ បញ្ញាបែបនេះថា អព្ភន្តញ្ញាណ Intuition ។ នេះជាបញ្ញាដ៏ឧដុង្គឧត្តម ខ្ពង់ខ្ពស់ បរិសុទ្ធ ។ ត្រង់ចំណុចនេះ ហើយដែលអ្នកវិទ្យាសាស្ត្រនានា រកឃើញស្នាដៃថ្មីៗ New discovery ។ អ្នកធ្លាប់ឃើញរូបព្រះបាទជ័យវរ្ម័នទី៧ ស្តេចអធិរាជខ្មែរក្នុងសម័យអង្គរដ៏រុងរឿងព្រះអង្គបិទភ្នែកសមាធិ ។ នេះគឺទ្រង់ប្រើបច្ចេកទេសដ៏ខ្ពស់បំផុតរបស់មនុស្សជាតិ ពោលគឺទ្រង់ខាបស្រូបយកបញ្ញាសកលមកប្រើតាមរយៈសមាធិ ( ចេញក្រៅប្រព័ន្ធម៉េម៉ូរីរបស់ទ្រង់) ។ តើមានអ្នកដឹកនាំយើងប៉ុន្មាននាក់ ដឹងនូវអាថ៌កំបាំងទាំងនេះ ?

តើអ្នកធ្លាប់ពិសោធសមាធិឬទេ ? បើពុំទាន់បានពិសោធទេ អ្នកពុំអាចចាប់យល់ដឹងបានឡើយថាខ្ញុំនិយាយអំពីរឿងអ្វី ។ ពីព្រោះអ្នកវិលក្រឡឹងជុំវិញតែក្នុងបន្ទប់ ឬប្រអប់ម៉េម៉ូរីប៉ុណ្ណោះ (ជាទីលំហាមានកំរិតពីអតីតកាល Bondage or limited space from the past )។ ខ្ញុំពិសោធឃើញភាពរំដោះពីកំហឹង ស្រេះ ពីទុក្ខក្រៀមក្រំ ការញៀន ភ័យភាពប្របូកប្របល់ក្នុងចិត្ត ។ល។ អ្នកច្បាស់ជាសួរថាពិសោធដូចម្តេចទៅ ? អ្នកពុំអាចយល់បានតាមប្រាជ្ញាឡើយ ពីព្រោះជាការពិសោធហួសអំពីបន្ទប់ម៉េម៉ូរី ហួសអំពីគំនិតមនុស្សគិតឃើញ ( experiences beyond human mind ) ។

ព្រះសង្ឃចិនមួយអង្គនិទានរឿងមួយជាគតិរំលេចនូវចំណុចខាងលើនេះ : មានដំណាលថា អណ្តើកធំមួយរស់នៅក្នុងទឹកផង នៅលើគោកផង ។ ថ្ងៃមួយនោះ ក្រោយពីវាត្រឡប់ពីទីគោកមកក្នុងទឹកវិញ ត្រីដែលជាមិត្តសំឡាញ់សួរអណ្តើកថា :ឪចុះឯងឡើងគោកម្តងៗ មានប្រទះទឹកត្រជាក់ទឹកថ្មីទឹកប្រកបដោយចំណីអាហារបរិបូណ៌ឬទេ ? ឱសំណួរនេះ លើកឡើងព្រោះត្រីពុំដែលស្គាល់សភាពទីគោកយ៉ាងណាឡើយ វារស់នៅតែក្នុងទឹកសុទ្ធសាធ ។

អ្នកប្រាជ្ញបូរាណបានលើករូបភាពជីវិតសត្វក្អាត់មកជាគតិដូចតទៅ : សត្វក្អាត់ជាកូន សត្វគីងគក់ដំបូងគឺគីងគក់ពង រួចញាស់ជាកូនក្អាត់វាមានដុះជើងផងកន្ទុយផង ហើយវារស់នៅតែក្នុងទឹកតែប៉ុណ្ណោះ ។ លុះដំណាក់កាលបន្ទាប់មកវាទំលាក់កន្ទុយចោល ហើយវាឡើងគោកអាចរស់នៅលើគោកបាន និងនៅក្នុងទឹកបាន ។ វាទទួលផលទាំងពីរទាំងពីការរស់នៅលើគោកផង ក្នុងទឹកផង ។ អ្នកប្រាជ្ញចង់និយាយប្រាប់យើងថា ចូរធ្វើត្រាប់តាមសត្វក្អាត់ ចូរទំលាក់កន្ទុយចោល (ទំលាក់មោហៈភាពល្ងិតល្ងង់ចោល) ហើយរស់នៅទាំងលើគោក ទាំងក្នុងទឹក (មានន័យថា ចូររស់នៅទាំងក្នុងម៉េម៉ូរី និងក្រៅម៉េម៉ូរីផង) ។

សូមអ្នកគប្បីភ្ញាក់រលឹករុករករៀនវិជ្ជាសមាធិ ដើម្បីឈានទៅដល់ ឬស្គាល់រសជាតិថ្មីមួយទៀតនៃជីវិតមនុស្សជីវិតប្រកបដោយប្រាជ្ញាបរិសុទ្ធរំដោះវិញ្ញាណទាំង៥ ឱ្យចេញផុតពីក្រញាំដៃដែករបស់ម៉េម៉ូរីពីលំហូរគំនិតដែលចងគ្រៀកយើងរាល់វិនាទីគ្មានទីបញ្ចប់ ។

ការប្រតិបត្តិសមាធិក្នុងសកម្មភាពជីវិតជាក់ស្តែងប្រចាំថ្ងៃ

ការហាត់អង្គុយសមាធិមួយថ្ងៃពីរដងក្នុងបន្ទប់ស្ងាត់ម្នាក់ឯងជាប្រការចាំបាច់ដើម្បីបណ្តុះទម្លាប់ថ្មី ។ ដំបូងយើងខិតខំប្រតិបត្តិតាមគ្រូណែនាំដោយពុំដឹងពុំយល់ឡើយ ជាបណ្តើរៗប្រាជ្ញាពីខាងក្នុងខ្លួនបានដុះឡើងជាបន្តបន្ទាប់ហើយបានហៀរចេញមកក្រៅជាការអនុវត្តជាក់ស្តែង ។ យើងចាប់ផ្តើមមានឥរិយាបថនិងមានទស្សនវិស័យផ្សេងពីមុនចំពោះបាតុភូតនានាដែលកំពុងលេចឡើងខាងក្នុង និងក្រៅខ្លួន ។ យើងចាប់ផ្តើមរកឃើញវិធីប្រតិបត្តិផ្សេងៗសំរាប់ឆ្លើយតបនឹងតម្រូវការជាក់ស្តែងក្នុងជីវិតប្រចាំថ្ងៃ ។

ក្នុងគោលការណ៍ទាំងបួនរបស់សមាធិវិបស្សនាដែលមាន : (1)ការមានសតិដឹង (2)ការ ទទួលយកការសុខចិត្ត (3)ការពុំដើរតួ (4) ការស្រាវជ្រាវលំអិតបាតុភូតខាងក្នុងទាំងកាយ និងចិត្ត ។ គោលការណ៍ទាំង៤ខាងលើនេះ ជាគន្លឹះសំខាន់បំផុតក្នុងដំណើរការស្វែងរកសេរីភាពពីបន្ទប់ម៉េម៉ូរីការរួចរដោះភាពសប្បាយរីករាយបរមសុខ ។

តទៅលេខក្រោយ



# ជោគជតារាសីទាំង12 ប្រចាំឆ្នាំថោះ



**ឆ្នាំជូត**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងក្រែងមានបងប្អូនញាតិមិត្តនាំរឿងក្តៅក្រហាយមកឲ្យអាចនាំឲ្យមានអំពល់ទុក្ខដាក់ខ្លួនព្រមទាំងអាចបង់ខាតទ្រព្យច្រើនទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានតែភាពផ្អែមល្ហែមស្និទ្ធស្នាលដូចធម្មតា ៕



**ឆ្នាំឆ្លូវ**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឡើយ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានជលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕



**ឆ្នាំខាល**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះលោកអ្នកជាមនុស្សពូកែខាងសម្តីវោហារ ហើយបើបានធ្វើជាមេគេនិងទោះ ជាបាននិយាយស្តីច្រើនបន្តិចក្តី ក៏មិនឥតប្រយោជន៍ដែរ ព្រោះត្រូវបានកូនចៅនៅ ក្រោមស្តាប់បង្គាប់បញ្ជាឥតហ៊ានងាករេទៀតផង ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេល នេះប្រកបដោយភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕



**ឆ្នាំថោះ**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសក្នុងការទូទាត់បញ្ជីប្រាក់កាសផ្សេងៗ ព្រោះកាលបើមានការភ្លាំងភ្លាត់តែបន្តិចអាចខាតបង់ទ្រព្យច្រើន ដែលមិនអាចគណនាបានឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះប្រយ័ត្នមានគេអុជអាលឲ្យបែកបាក់គ្នា ៕



**ឆ្នាំរោង**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តី ក៏មិនភ័យព្រួយអ្វីដែរ លោកអ្នកអាចទម្លុះទម្លាយបានដោយជោគជ័យ និងអាចបោះជំហានទៅមុខដោយសន្សឹមៗទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះគឺអាចគិតគូររឿងអាពាហ៍ពិពាហ៍បាន ៕



**ឆ្នាំម្សាញ់**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេល ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងរដឹងខ្លាំងយ៉ាងណាក្តី ក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកម្លោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕



**ឆ្នាំមមី**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈ ពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



**ឆ្នាំមមែ**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើងមានការមមាញឹក និងហត់នឿយច្រើនក្តីតែភោគផលកម្រៃហូរចូលបានតិចតួចស្តួចស្តើងប៉ុណ្ណោះ ។ ដូច្នេះចូរកុំរកបានមកដោយតឹងតែចាយធូរឲ្យសោះ ។ ចំពោះស្នេហាក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលជ្រៀតជ្រែក ៕



**ឆ្នាំវក**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបការងារអ្វីក៏អាចទទួលបានផលសម្រេចតាមការបំណងប្រាថ្នាទាំងអស់ ។ តែចូរកុំមានចិត្តលោភលន់ឲ្យហួសប្រមាណពេក ប្រយ័ត្នបង់ខាតលាភសក្ការៈទៅវិញ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អីនល្អណាស់ ៕



**ឆ្នាំរកា**

រាសីលោកអ្នកចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរ គឺមុននឹងប្រគល់ ឬទទួលទូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវចុះសម្រុងគ្នាទេ ៕



**ឆ្នាំច**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ពិតមែនតែលោកអ្នកបានជួបនឹងឱកាសល្អខ្លះៗក្តីតែ ទោះជាបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសមុននឹងចុះហត្ថលេខា ឬផ្តិតស្នាមមេដៃលើលិខិតស្នាមផ្សេងៗ ចូរចេះពិនិត្យពិច័យឲ្យបានល្អិតល្អន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះចេះយល់អធ្យាស្រ័យគ្នាធម្មតា ៕



**ឆ្នាំកុរ**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬចេញទៅជួញដូរផ្លូវឆ្ងាយគឺសមប្រកបទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយ សេចក្តីសុខក្សេមក្សាន្ត ៕

សោភ័ណភាព

# ស្ងោរស៊ុតឱ្យមានរសជាតិឆ្ងាញ់

●●●ស៊ុត គឺជាអាហារដែលប្រជាជនខ្មែរ និយមយកធ្វើម្ហូបជាទីបំផុត ដូចជាយកមកចៀន ឬស្ងោរជាដើម ។ បើនិយាយពីរឿងស្ងោរស៊ុត នរណាក៏ចេះស្ងោរដែរ ប៉ុន្តែវិធីស្ងោរស៊ុតឲ្យមានរសជាតិឆ្ងាញ់ ពុំមែននរណាក៏ចេះវិធីនោះឡើយ ។ វិធីស្ងោរស៊ុតឲ្យឆ្ងាញ់ គឺជាការងាយស្រួលទេ គឺមុនពេលស្ងោរត្រូវយកម្ជុលដេរចោះរន្ធត្រង់ពាក់កណ្តាលពង ដើម្បីកុំឲ្យពងបែក ហើយមិនត្រូវយកពងនេះទៅដាក់ស្ងោរក្នុងទឹកកំពុងពុះទេ ។ ប្រសិនបើយើងបង់អំបិលបន្តិចបន្តួចធ្វើឲ្យស៊ុតងាយស្រួលបកមិនជាប់សំបកឡើយ ៕



# បបរសណ្តែកក្រហមឱ្យឆ្ងាញ់ និងឱ្យសណ្តែកទន់

●●●ជាដំបូងត្រូវលីងសណ្តែកឲ្យឆ្អិនជាមុនសិនរួចហើយយកទៅស្ងោរឲ្យផុយរលួយ ទើបដាក់ស្ករចូលតាមក្រោយជាការស្រេច ។ ព្រោះការលីងសណ្តែកឲ្យឆ្អិនជាមុនអាចជួយឲ្យសណ្តែកឆាប់ឆ្អិនរលួយក្នុងពេលស្ងោរ ហើយធ្វើឲ្យមានក្លិនឈ្ងុយផង ។ ចំណែកការដាក់ស្ករតាមក្រោយធ្វើឲ្យសណ្តែកមិនរឹង ព្រោះយើងស្ងោរសណ្តែកមិនទាន់រលួយផង ហើយប្រញាប់ដាក់ស្ករពេកវាធ្វើឲ្យសណ្តែករឹងមិនគួរឲ្យចង់ទទួលទានឡើយ ៕



# ហាត់ប្រាណ 7 នាទី ដើម្បីទប់ស្កាត់រោគទឹកនោមផ្អែម

●●●អ្នកពិសោធន៍នៅក្នុងប្រទេសអង់គ្លេសបានបង្ហើបថា ការហាត់ប្រាណយ៉ាងធ្ងន់ធ្ងរត្រឹមតែ១សប្តាហ៍៧នាទីនោះ អាចជួយការពាររោគទឹកនោមផ្អែមបាន ព្រោះវាជួយគ្រប់គ្រងកម្រិតស្ករនៅក្នុងឈាម ។ លោក ជែមធីមម៉នអ្នកវិទ្យាសាស្ត្រផ្នែកកាយភាពពីសាកលវិទ្យាល័យ ហេរៀនវ៉ាត់ នៅអេឌីន បើរ៉ាក់ព្រមទាំងក្រុមការងារបានគូសបញ្ជាក់ថា ការហាត់ប្រាណរយៈពេលខ្លីៗដោយញើសមិនទាន់ទាំងចេញផងនោះ វាអាចផ្តល់ប្រយោជន៍ដល់រាងកាយបានច្រើនបំផុតមិនចាញ់ការហាត់ប្រាណក្នុង១សប្តាហ៍ច្រើនម៉ោងនោះឡើយ ។



ជាពិសេសការហាត់បន្ថយភាពប្រឈមនឹងរោគទឹកនោមផ្អែមដែលមានអ្នកជំងឺរ័យចំណាស់ប្រហែល២៤៦លាននាក់ទូទាំងពិភពលោកផងដែរ ។

លទ្ធផលការសិក្សាទៅលើក្រុមអ្នកស្ម័គ្រចិត្តបុរសអាយុផ្តើមចូល២០ឆ្នាំមានសុខភាពរឹងមាំតែរាងកាយធាត់ចំនួន១៦នាក់គេបានរកឃើញថា ការហាត់ប្រាណត្រឹមតែ១សប្តាហ៍៧នាទីអាចជួយគ្រប់គ្រងកម្រិតអ៊ីនសូលីននៅក្នុងឈាមបាន ។ លោកធីមម៉នបានឲ្យក្រុមអ្នកស្ម័គ្រចិត្តសម្រុកហាត់ប្រាណធាក់កង់ពេញទំហឹងមួយដង៣០វិនាទី១ថ្ងៃ៤ដង ១សប្តាហ៍២ថ្ងៃជាប់បន្តគ្នារយៈពេល២សប្តាហ៍ក៏រកឃើញថា អ៊ីនសូលីននៅក្នុងរាងកាយអ្នកស្ម័គ្រចិត្តអាចបំប្លែងជាតិស្ករនៅក្នុងឈាមឲ្យក្លាយទៅជាថាមពលបានកាន់តែល្អឡើងប្រហែល២៣ភាគរយ ៕

តមកពីទំព័រទី ១

## លោកស្រី យីងឡាក់ នឹងមក...

យើងរំពឹងថា អ្វីៗនឹងត្រូវបានដោះស្រាយដោយសន្តិវិធី"។

កាសែត ឌីណេហ្សិន របស់ថៃបានរាយការណ៍ថា លោកស្រី យីងឡាក់ នឹងត្រូវរួចដំណើរដោយរដ្ឋមន្ត្រីការបរទេស ស៊ូរ៉ាពុង តូវិកចាកនៃគុល។

កាសែតដដែលនេះបានបន្តថា លោក ស៊ូរ៉ាពុង នឹងប្រើប្រាស់ ដំណើរទស្សនៈកិច្ចនេះធ្វើជាឱកាសមួយ ដើម្បីជំរុញឱ្យលោក ហោ ណាំហុង រដ្ឋមន្ត្រីការបរទេសធ្វើយ៉ាងណាឱ្យមានការដោះលែងសកម្មជន "អាវ លឿង" ថៃជាតិនិយមជ្រុលពីរនាក់ ដែលត្រូវបានកាត់ទោសពីបទចារកម្ម និងដែលត្រូវបានឃុំខ្លួនក្នុងពន្ធនាគារកាលពីដើមឆ្នាំនេះនៅក្នុងក្រុងភ្នំពេញ។

លោក កុយ គួង បានមានប្រសាសន៍ថា លោកមិនប្រាកដថា តើរដ្ឋមន្ត្រីការបរទេសទាំងពីរនេះ មានគម្រោងជួបគ្នាដែ ឬយ៉ាងណាទេ ហើយបានមានប្រសាសន៍ថា ការដោះលែងអ្នកទោសថៃទាំងពីរនាក់នេះនឹងត្រូវអនុលោមទៅតាមច្បាប់ និងកិច្ចព្រមព្រៀងរវាងប្រទេសទាំងពីរ។

កាសែត ឌីណេហ្សិន ក៏បានរាយការណ៍ផងដែរថា លោក យុត្ថាសាក់ សាស៊ីប្រាផា ជារដ្ឋមន្ត្រីការពារជាតិថៃមានគម្រោងមកបំពេញទស្សនៈកិច្ចនៅកម្ពុជានៅចុងខែនេះ ដើម្បីពិភាក្សាពីបញ្ហាកងទ័ពនៅតំបន់ព្រំដែន និងលទ្ធភាពនៃការបន្តកិច្ចប្រជុំគណៈកម្មាធិការព្រំដែនទូទៅដែលត្រូវបានពន្យាពេលម្តងហើយម្តងទៀត ក្នុងរយៈពេលពីរបីខែចុងក្រោយនេះ។

កាលពីខែកក្កដា បន្ទាប់ពីមានការប៉ះទង្គិចដែលកាន់តែបង្ហូរឈាមម្តងហើយម្តងទៀតជុំវិញទឹកដីនៅតំបន់ព្រំដែនក្បែរប្រាសាទព្រះវិហារមកតុលាការអន្តរជាតិបានបង្គាប់ឱ្យប្រទេសទាំងពីរដកកងទ័ពរបស់ខ្លួនចេញពីតំបន់មានជម្លោះ ហើយបានបង្កើតតំបន់គ្មានកងទ័ពនៅជុំវិញប្រាសាទនេះ។

ការដកកងទ័ពចេញទាំងស្រុងតាមការបង្គាប់របស់តុលាការនេះ បានជាប់គាំងក្រោមអាណត្តិរដ្ឋាភិបាលរបស់អតីតនាយករដ្ឋមន្ត្រីថៃ អភិស៊ីត វីចាជីវ៉ា ព្រោះប្រទេសទាំងពីរមិនត្រូវរ៉ូវគ្នាត្រង់ថា តើប្រទេសណាដែលគួរដកកងទ័ពមុន។

លោកឧត្តមសេនីយ៍ឯក ឈុំ សុជាតិ ជាអ្នកនាំពាក្យក្រសួងការពារជាតិបានមានប្រសាសន៍ថា លោកមិនទាន់បានទទួលព័ត៌មានផ្លូវការពីសមភាគីថៃរបស់លោកនៅឡើយទេពាក់ព័ន្ធនឹងដំណើរទស្សនៈកិច្ចរបស់ឧត្តមសេនីយ៍ យុត្ថាសាក់ នោះ។

កាសែតបាងកកប៉ុស្តិ៍បានរាយការណ៍កាលពីម្សិលមិញថា ក្រៅពីដំណើរទស្សនៈកិច្ចរបស់នាយករដ្ឋមន្ត្រី និងរដ្ឋមន្ត្រីនានារបស់ថៃនេះ ក្រុមបាល់ទាត់មួយដែលសុទ្ធសឹងតែជាសមាជិកសភានៃគណបក្សភឿថៃ នឹងមកកម្ពុជានៅចុងខែនេះ ដើម្បីប្រកួតបាល់ទាត់ជាលក្ខណៈមិត្តភាពជាមួយក្រុមមន្ត្រីរដ្ឋាភិបាលកម្ពុជា៕

# Thai Prime Minister to meet Hun Sen

By Neou Vannarin
THE CAMBODIA DAILY

Thai Prime Minister Yingluck Shinawatra will make her official trip to Cambodia next Thursday, when she is scheduled to meet with Prime Minister Hun Sen, officials said yesterday.

Previously frayed relations between Thailand and Cambodia have been on the mend since Ms Yingluck's recent election victory.

The younger sister of Thailand's former Prime Minister Thaksin Shinawatra, Ms Yingluck led the Cambodia-friendly Pheu Thai Party to victory in July. Since then, tensions on the Thai-Cambodian border have eased, and officials from both countries have repeatedly praised the warming relations.

"She will pay her official visit on Sept 15. It will a one-day visit only," Ministry of Foreign Affairs spokesman Koy Kuong said.

Mr Kuong confirmed that Ms Yingluck would be meeting with the prime minister, but said he had no information about with the two would discuss.

Phay Siphan, spokesman for the Council of Minsters, said Ms Yingluck's visit heralded the recovery of relations between the two countries. "This is a positive sign of starting a new era of cooperation," he said. "We expect everything will be solved in a peaceful matter."

Thai newspaper The Nation reported that Ms Yingluck would be accompanied by Foreign Minister Surapong Towichuk- chaikul.

Mr Surapong will use the visit as an opportunity to press Foreign Minister Hor Namhong for the release of two ultra-nationalist Thai "yellow-shirt" activists convicted on espionage charges and imprisoned earlier this year in Phnom Penh, The Nation reported.

Mr Kuong said he was not sure whether the two foreign ministers had a scheduled meeting and said that the release of the Thai prisoners would have to follow the laws and agreements of both countries.

The Nation also reported that Thai Defense Minister Yuthasak Sasipraphа plans to visit Cambodia later this month to discuss troop arrangements at the border and the possibility of activating the General Border Committee meeting.

In July, after repeated and increasingly bloody clashed over border territory near Preah Vihear temple, the International Court of Justice ordered both nations to withdraw their troops from the contested area, and demarcated a demilitarized zone around the temple. A full troop pullout, as ordered by the court, stalled under the government of former Thai Prime Minister Abhisit Vejjajiva as both countries debated who should leave first.

RCAF Lieutenant General Chhun Sucheat, spokesman for the Defense Ministry, said that he had not yet received official work from his Thai counterpart regarding the visit of Gen Yuthasak.

In adding to the visiting Thai prime minister and ministers, a football team made up of Pheu Thai parliamentarians will come to Cambodia later this month to play a friendly football match against a Cambodian government team, the Bangkok Post reported yesterday.

# សូមអញ្ជើញមកផ្សារ មិនស៊ីធី ទី២ នៅស្ព្រីងហ្គាឌិន និងទី៤



# SPRING GARDEN SUPERMARKET

400 Spring Garden Street. (4th St.Corner), Philadelphia, PA 19123 Tel: (215) 928-1288

## ទិញច្រើនសន្សំច្រើន

Accept credit cards / Foodstamp.

| សុក្រ | សៅរ៍ | អាទិត្យ | ច័ន្ទ | អង្គារ | ពុធ | ព្រហស្បតិ៍ |
|---|---|---|---|---|---|---|
| FRIDAY | SATURDAY | SUNDAY | MONDAY | TUESDAY | WEDNESDAY | THURSDAY |
| 26 | 27 | 28 | 29 | 30 | 31 | 01 |

- Taro 99¢ /2LB
- Japanese Pumkin 69¢ /LB
- Winter Melon 99¢ /3LB
- Green Peper 59¢ /LB
- lobster $5.99/lb
- Goat Meat $3.49 /LB
- Pork Ribs $1.59 /LB
- Chicken Leg 79¢ /3LB
- Chicken Wing $1.29 /LB
- pork feet $0.89/lb
- Coconut $1.19 /EA
- Cola Flavored marinate $2.29 /EA
- Cooking Wine $1.29 /EA
- Oyster Sauce $1.19 /EA
- Chicken $4.99



**Spring Garden Market**
**Space Rental Available**
មានកន្លែងជួលឲ្យធ្វើជំនួញ

## ចាយច្រើនទទួលបានកាដូច្រើន

Business Hrs: 8:00AM – 8:30PM

មានកន្លែងចតឡានដោយឥតគិតថ្លៃ

Direction

**Free Gifts**

- ចាយ $100 ទទួល Free$10 Coupon
- ចាយ $80 ទទួល Free 1 Box Cup Noodle
- ចាយ $50 ទទួល Free 1 Case of Drinks
- ចាយ $25 ទទួល Free 1 Dozen egg or others

